PRIMERICA
A Citi Company
Chanthy Sek &
Shawn Dougherty
Bus: 1-866-582-3172
Cell: 267-984-8554
Life Insurance
Car Insurance
Refinance Your Debts.
Investments
Office or Home Appointment.
We also provide translation and interpretation services.
យើងផ្ដល់ការបកប្រែភាសា តាមក្រដាស ឬផ្ទាល់មាត់
E-mail: 8666823172@primerica.gosolo.com
Primerica Financial Services. 1035 Virginia Dr., Ste 100H, Ft. Washington, Pa 19034

# ខ្មែរប៉ុស្តិ៍

THE KHMER POST

ISSUE 49 11th - 23th December 2009

ហាងមាសរស្មី
SUNSHINE JEWELRY INC
•Fine Jewelry
•Certified Diamonds & Custom Design
មានលក់គ្រឿង អលង្ការ យ៉ាងប្រណិតបំផុត ចេញសញ្ញាបត្រលើពេជ្រអាច ផ្លាក់ ឬ ប្ដូរ មាស ប្រាក់ ពេជ្រ ជូនតាមបំណង ។
702 Washington Avenue
Philadelphia, Pa 19147
Phone: (215) 271-2950
Fax: (215) 271-2962
Email: colorofsunshine@yahoo.com

សូមអញ្ជើញលោកអ្នកអានអត្ថបទជាភាសាអង់គ្លេសនៅទំព័រខាងក្នុង ដែលបានដកស្រង់ចេញពីសារព័ត៌មាន The Cambodia Daily នៅប្រទេសកម្ពុជា។

*វិចារណកថា :*

## សួស្តីឆ្នាំ ២០១០

ដោយ : ពិន សំខុន

•••បារ៉ាក់ អូបាម៉ា ប្រធានាធិបតីសហរដ្ឋអាមេរិក បានត្រៀមបញ្ជូនកងទ័ពពាម៉ឺននាក់ទៅអាហ្វហ្គានីស្ថាន ត្រៀមនឹងចំណាយសន្ទឹកសន្ទាប់ ទៅលើវិស័យសុខភាព- ត្រៀមចំណាយខ្ពស់ឥតមានថ្លឹមទៅលើវិស័យសិក្សាធិការពលរដ្ឋ ទាំងនេះ ជាវិនិយោគដ៏ធំៗ ជាសញ្ញាថានៅឆ្នាំ ២០១០ ដែល នឹងមកដល់នាកន្លះខែទៀតនេះ ពុំមែនជាការធូរស្រាលចំពោះស្ថានភាពសេដ្ឋកិច្ចគ្រួសាររបស់ពលរដ្ឋរស់នៅដែនដីអាមេរិកាំង ដូចដែលស្ថិតិ បានផ្ដល់សេចក្ដីសង្ឃឹមខ្លះៗមកហើយនោះទេ ។ រោងចក្រ ឬធានាគារនៅតែបន្តបិទទ្វារ បង្ហាញនូវការងារត្រូវបញ្ចុះចំនួនជារៀងរាល់ថ្ងៃ- ថ្វីត្បិតតែមានការបន្ថយពន្ធអាករក្រាស់ក្រែល ក៏ចំនួនផ្ទះពុំត្រូវលក់ ឬទិញកើនចំនួននៅឡើយទេ -នៅពីរខែចុងក្រោយមនុស្ស បានផ្អើលទិញទំនិញចុះថ្លៃ នា "ថ្ងៃសុក្រពណ៌ខ្មៅ" (Black Friday) ថ្ងៃបុណ្យ អរព្រះគុណ ឥឡូវបុណ្យគ្រិស្ទីស និងបុណ្យចូលឆ្នាំថ្មី នេះក៏ពុំមែនជាកំណើននៃពាណិជ្ជកម្មក្នុងស្រុកទេ ដោយហេតុថាទំនិញក្នុងគុណភាព និងតម្លៃថម្មតា នៅតែលក់មិនដាច់ដដែល ។

ទាំងនេះពុំមែនបានន័យថា ខ្ញុំនិយាយអាក្រក់ពីសហរដ្ឋអាមេរិកនោះទេ **តទៅទំព័រទី ១៦**

## ខ្មែរនៅ ស.រ.អា ធ្វើបាតុកម្មប្រឆាំង ហ៊ុន សែន

**ដោយ : ម៉ម យឹន**

•••កាលពីថ្ងៃសៅរ៍ ទី២៨ ខែវិច្ឆិកា ឆ្នាំ ២០០៩ វេលាម៉ោង១១ព្រឹក ប្រជាពលរដ្ឋខ្មែររស់នៅសហរដ្ឋអាមេរិក ឆ្នេរសមុទ្រខាងកើតប្រមាណជិត២០០នាក់ ធ្វើដំណើរមកពីរដ្ឋផ្សេងៗ ដូចជា : រដ្ឋ ក្ការូឡាណា ខាងជើងរដ្ឋ វើជីនញ៉ា រដ្ឋមារីឡិន រដ្ឋផេនស៊ីលវេនា រដ្ឋម៉ាសាឈូសិត រដ្ឋរ៉ូតអៃឡិន ជាដើមធ្វើដំណើរទៅកាន់ ក្រុងវ៉ាស៊ីងតុនឌីស៊ី ជួបជុំគ្នានៅមុខស្ថានទូតខ្មែរប្រចាំនៅសហរដ្ឋអាមេរិកយ៉ាងកកកុញ ។

បាតុកម្មអហឹង្សា បានចាប់ផ្ដើមរៀបចំធ្វើការដើរក្បួនក្នុងរបៀបរៀបរយនៅមុខស្ថានទូតខ្មែរស្ថិតនៅផ្លូវលេខ១៦ភាគខាងលិចក្រុងវ៉ាស៊ីងតោនឌីស៊ី ហ្សីបខូត ២០០១១ ដោយគ្រប់គ្នាមានទង់ជាតិខ្មែរ និងអាមេរិកាំង និងកាន់ផ្ទាំងពាក្យស្លោកផ្សេងៗមានជាអាទិ៍ថា : "ហ៊ុន សែន ត្រូវឈប់រំលោភបំពានលើសិទ្ធិ

**តទៅទំព័រទី ១៨**

Yoo's Auto Service and Collision
យូ បំរើសេវារថយន្ត
នឹងរថយន្តគ្រោះថ្នាក់ប៉ះទង្គិច
FREE ESTIMATES
យើងនឹងជួសជុលរថយន្តដ៏មានតម្លៃរបស់លោកអ្នក ឱ្យបានប្រសើរបំផុត តាមតែយើងធ្វើបាន ដើម្បីសុវត្ថិភាពលោកអ្នក មិនឱ្យខុសចិត្តឡើយ ។
COUPON
$10 OFF TOWARD EMISSION AND STATE INSPECTION
ពេទ្យខាងម៉ាស៊ីន
Check Engine Light Diagnostic
Electronic Wheel Alignment
Certified Enhanced Emission
Inspection & Repairs
Muffler & More
ពេទ្យជួសជុលតួរថយន្ត
Expert Body Work
Fender & Paint Work
Frame Straightening
Insurance Specialists
ទូរស័ព្ទលេខ SAM 215-457-7777 ឬ 215-457-7779, Fax-215-457-7475
189 W. Duncannon Ave. Phila., PA 19120

## ចូលឆ្នាំថ្មី ដោយក្រុមសិល្បៈភ្លេង និងរបាំចិន

**ដោយ : ពិន សំខុន**

•••ឆ្នាំមុនបានឃើញក្រុមសិល្បៈចិន ដ៏ធំប្រកបដោយសិល្បករភ្លេងចម្រៀង និងរបាំដ៏ជំនាញជាច្រើនរយនាក់ឈ្មោះដើម "ក្រុមសិល្បៈទេវ (Divine Performing Arts) បានចេញមកសម្ដែងនៅលើឆាកសិល្បៈក្លាសិក របស់ខ្លួនប្រកបដោយទេពកោសល្យខ្ពស់ ធ្វើឱ្យអ្នកមើលមានការចាប់អារម្មណ៍ស្ទើរភ្លេចដកដង្ហើម ។ ជនជាតិអាស៊ីមួយនេះ ធ្លាប់មានព្រំដែនជាប់កម្ពុជា មានប្រវត្តិលើទឹកដីខ្លួនច្រើនជាង ៥០០០ឆ្នាំ បានចេញមកបង្ហាញខ្លួនសាជាថ្មីនៅ ហ្វីឡាដែលហ្វៀ ថ្ងៃទី២ ខែមករា ឆ្នាំ ២០១០ ម៉ោង ៧:៣០ ល្ងាច និងថ្ងៃទី៣ ខែមករា ឆ្នាំដដែល វេលាម៉ោង ២:០០ រសៀល នៅរោង "Academy of Music" នៅជ្រុងផ្លូវ Broad និង Locust គឺប្រាកដជារង្វាន់ដ៏ថ្លៃថ្លាដល់ពលរដ្ឋតំបន់យើង នាឱកាសចូលឆ្នាំថ្មី ២០១០ ជាមិនខាន។

នៅក្នុងឆ្នាំ ឈ្មោះថ្មី "Shen Yon Performing Arts" សិល្បករមានបំណងរឹតតែខ្ពស់ ដែលតួឯកម្នាក់ឈ្មោះ ទីម៉ូទីវ Timothy Wo ឧទានថា "យើងចង់ផ្ដល់ទស្សនិកជននូវរសជាតិនៃសម្ផស្សប្រណិត និងគុណសម្បត្តិប្រសើរ...

**តទៅទំព័រទី ១៩**






ពីញូយ៉កទៅតាយប៉េ
ហោះ ៤ ជើងក្នុងមួយសប្តាហ៍

ចាប់ផ្តើមហោះហើរពីថ្ងៃទី ០៦ ខែ សីហា ឆ្នាំ ២០០៩ // "អេវ៉ា" អាកាសចរមានសេវា ញូយ៉ក-តាយប៉េ នៅថ្ងៃច័ន្ទ ថ្ងៃពុធ-ថ្ងៃព្រហស្បតិ៍ និងថ្ងៃសៅរ៍...ធ្វើឱ្យដំណើរទៅកាន់ទ្វីបអាស៊ីមានភាពប្រសើរគ្មានពេលណាដូច យន្តហោះថ្មីធុន ជាមួយនឹងបន្ទប់ធំទូលាយ និងមានបច្ចេកទេសទំនើបចែកជាថ្នាក់អ្នកដំណើរទី១ ថ្នាក់អ្នកដឹកនាំ និងថ្នាក់អ្នកដំណើរមធ្យម មានបន្ទប់បុគ្គលិកគួរឱ្យចូលចិត្ត សម្រាប់បង្កើនបរិយាកាសសម្រាកកាយ និងកក់ក្តៅក្នុងចិត្ត ធ្វើឱ្យដំណើរលោកអ្នករឹតតែរីករាយប្រសើរឡើង ។









EVA Wings – Booking, Buying and Bonuses just a click away at www.evaair.com
Contact us at our local service hotline: 800-695-1188



# ពិធីលៀងភោជនាហារ រាត្រីចូលឆ្នាំ សួស្តីឆ្នាំ 2010

សូមអញ្ជើញក្រុមគ្រួសារនឹងប្រិយមិត្តទាំងអស់មកជប់លៀងលាឆ្នាំប្រកបដោយការងារដំឡើយហត់ ហើយនឹងសម្លឹងឆ្ពោះទៅឆ្នាំ ២០១០ នៃសេចក្តីសង្ឃឹមជាមួយគ្នា

រៀបចំដោយសារព័ត៌មានខ្មែរប៉ុស្តិ៍

នៅថ្ងៃ : ទី០១ ខែ មករា ឆ្នាំ ២០១០
ពីម៉ោង ៦:៣០ ដល់ ១២ អធ្រាត
នៅ : ភោជនីយដ្ឋានខ្មែរ កាវី
320 W. Oregon Avenue. Philadelphia, Pa 19148

អញ្ជើញពិសារម្ហូបខ្មែរសុទ្ធសាធ ចំអិនដោយចុងភៅមានបទពិសោធន៍ច្រើនឆ្នាំ ស្តាប់ភ្លេង "តន្ត្រីវាយោ" រាំកំសាន្ត និងកំសាន្តឆាកល្ខោន មានរង្វាន់ប្តូរគ្នា មានឆ្នោតវត្ថុតតតិតថ្លៃ និងរង្វាន់ផ្សេងៗទៀត
តម្លៃចូលកំសាន្ត $40

ចំពោះឆ្នាំនេះលោកអ្នកអាចផ្តើមទិញសំបុត្រចូលបានហើយដោយហៅទូរស័ព្ទលេខ
267-253-3947 ឬ 267-254-8758
គ្មានសំបុត្រលក់នៅមាត់ទ្វារចូលទេ · សំលៀកបំពាក់សមរម្យ

# NEW YEAR CELEBRATION HAPPY 2010

Family and Friends are Invited to Celebrate a Year of Hard Work and Look Into a Hopefulness Year of 2010

WHEN : 01.01.10 6 P.M – 12 A.M.
WHERE : KAVEI RESTAURANT
320 W. Oregon Avenue. Philadelphia, Pa 19148

Authentic Cambodian Foods Will Be Served.
Live Music, Dance, and Play
Gifts Exchanged and FREE Raffles Give Away!
ADMISSION : $40.00

HOSTED BY:
ខ្មែរប៉ុស្តិ៍
ឆ្នេរខាងកើត
THE KHMER POST
EAST COAST
The Cambodian-American Biweekly News

Tickets Are On Sale Now. Please Call
267.253.3947 or 267.254.8758
to Make Your Reservation.
No Tickets Sold at the Door. Semi-formal Attire.

# "សង់តាក្លូ" នាំរដូវបុណ្យ

# THANKSGIVING

**ព័ត៌មានដោយរូបភាព :** គ្រួសារខ្មែរ នៅហ្វីឡាដែលហ្វៀ ៥ គ្រួសារ បានទទួល សង់តាក្លូ ឈ្មោះ Ric Maccarong ដែលនាំអំណោយមួយកញ្ចប់ធំ សម្រាប់គ្រួសារមួយ មកចូលរួមអបអរពិធីបុណ្យអរព្រះគុណ Thanksgiving ដែលទើបកន្លងទៅ











នាចុងខែវិច្ឆិកានេះ ។ សូមអញ្ជើញមើលទឹកមុខរីករាយនៃក្រុមគ្រួសារខ្មែរ នាពេលទទួលអំណោយ : អរគុណ Ric ! អរគុណក្រុមអ្នកផ្ដល់ជំនួយ ! និងអរគុណ លោកគ្រូ វិសាកា ដែលបានណែនាំ Ric ឱ្យបានជួបសមាគមន៍ខ្មែរ ដែលកំពុងតែត្រូវ ការមិត្ត ៕

# នាឱកាសចូលឆ្នាំសាកលថ្មី ថ្ងៃទី១ មករា ឆ្នាំ២០១០ ខាងមុខនេះ

•••សារព័ត៌មាន "**ខ្មែរប៉ុស្តិ៍**" ឆ្នេរខាងកើត មានសោមនស្សរីករាយ សូមអញ្ជើញលោកអ្នក មកចូលរួមសម្ដែងការអបអរសាទរឆ្នាំថ្មី ដែលនឹងសន្យាថានាំមកនូវស្នាដៃថ្មីទៀត សម្រាប់សមាគមខ្មែរ បន្ទាប់ពីលោកអ្នក នៅរដ្ឋ "ផែនស៊ីវេនា" នេះ បានបំពេញភារៈកិច្ចប្រកបដោយជោគជ័យអស់រយៈពេញមួយឆ្នាំមុនមក ។

"**ខ្មែរប៉ុស្តិ៍**" រៀបចំការជប់លៀងរបស់ខ្លួន ជាមួយនឹងលោកអ្នកថ្ងៃនោះ នៅ "ភោជនីយដ្ឋានខ្មែរ "ការី" ពីព្រោះចង់បង្កើតឱកាសមុនគេបង្អស់ សម្រាប់លោកអ្នកបង្ហាញពីទឹកចិត្តប្ដូរផ្ដាច់ លើកដំកើងអក្សរខ្មែរ ម្ហូបខ្មែរ វប្បធម៌ខ្មែរ សហគមន៍ខ្មែរ នៅភោជនីយដ្ឋានខ្មែរ ខាតមធ្យមដំបូងបង្អស់ ដែលទើបនឹងចាប់កំណើតនៅ ហ្វីឡាដែលហ្វៀ យើងនេះ ។

"**ខ្មែរប៉ុស្តិ៍**" ក៏ចង់មានឱកាសថ្លែងអំណរគុណលោកអ្នកទាំងអស់ ដែលបានជួយជ្រោមជ្រែង លើកទឹកចិត្តយើងខ្ញុំ ជាអ្នកនាំសារឱ្យបន្តសកម្មភាពសារព័ត៌មានខ្មែរ នៅបរទេស បានរស់ទៅមុខបានយូរអង្វែង ។

សូមអញ្ជើញមកជប់លៀងជាមួយគ្រួសារ ដើម្បីគ្រួសារយើងម្ដង បំណាច់បានប្រឹងធ្វើការយ៉ាងហត់នឿយជាមួយគ្នា ពេញមួយឆ្នាំហើយ ។

ពិន សំខុន

នាយកការផ្សាយ "**ខ្មែរប៉ុស្តិ៍**"

# សុវត្ថិភាពសិស្សអាស៊ី នៅហ្វីឡាដែលហ្វៀ នៅតែគ្មានអ្នកការពារ

•••ឧប្បត្តិហេតុថ្មីមួយ បានកើតឡើងនៅវិទ្យាល័យហ្វីលីខាងត្បូង (South Philly High School) ចំពោះកូនសិស្សអាស៊ី ប្រមាណជា ២០ នាក់ ត្រូវបានក្រុមយុវជនអាហ្វ្រិកាំង-អាមេរិកាំង ព័ន្ធវាយធ្វើបាបនៅសាលា និងនៅជុំវិញបរិវេណសាលាពេញមួយថ្ងៃ ដោយគ្មានកិច្ចការពារពីសំណាក់សមត្ថកិច្ច ឬពីសាលារៀនឡើយ កាលពីថ្ងៃព្រហស្បតិ៍ ទី៣ ធ្នូ មុននេះ ។

សិស្សសាលាអាស៊ីទាំងនេះ មាន ចិន វៀតណាម និងខ្មែរ ដែលភាគច្រើនជាសិស្សថ្មី ដែលទើបមកដល់សហរដ្ឋអាមេរិក បានបើកសន្និសីទកាសែត នៅឆាយណាថោន ក្នុងវិហារគ្រីស្ទានចិនមួយ មុននឹងធ្វើសេចក្ដីរាយការណ៍ទៅក្រសួងអប់រំ ស្គូល ឌីស្ត្រីក ទាមទារឱ្យមានកិច្ចការពារសុវត្ថិភាព ។ នៅពេលមិនឃើញមានការយកចិត្តទុកដាក់ ក្រុមសិស្សអាស៊ីទាំងនោះ បានចេញសេចក្ដីថ្លែងការណ៍ ប្រកាសមិនចូលរៀន រហូតដល់ ស្គូល ឌីស្ត្រីក ធានាសុវត្ថិភាពឱ្យបានគ្រប់គ្រាន់ ។

ក្រុមសិស្សអាស៊ី មានការគាំទ្រពីឪពុកម្ដាយខ្លួន ហើយនិយាយថា មកទល់ថ្ងៃអង្គារ នេះ គ្មានអ្នកគ្រប់គ្រង ស្គូល ឌីស្ត្រីក ណា ទូរស័ព្ទមកសួរសុខទុក្ខដល់ពួកខ្លួន ឬទៅមាតាបិតាខ្លួនម្នាក់ឡើយ ។

មេដឹកនាំ ស្គូល ឌីស្ត្រីក បានធ្លាប់សន្យាដល់ឪពុកម្ដាយនៃសហគមន៍អាស៊ី កាលពីមកសុំការគាំទ្រដល់កម្មវិធីសិក្សាឆ្នាំ ២០១៤ នៅ ហ្វីឡាដែលហ្វៀ ថានឹងផ្ដល់ការយកចិត្តទុកដាក់ជាពិសេសដល់កិច្ចសិក្សារបស់សហគមន៍ តែសប្ដាហ៍នេះ បានធ្វើឱ្យគ្រួសារសហគមន៍អាស៊ីខកចិត្តយ៉ាងខ្លាំង ។

ថ្ងៃពុធ ទី៩ ធ្នូ នេះ នឹងមានបាតុកម្មអាស៊ី ចេញមកពី ឆាយណាថោន សំដៅទៅ ស្គូល ឌីស្ត្រីក ៤៤០ ផ្លូវ Broad ខាងជើង ដើម្បីធ្វើការទាមទារ រហូតដល់ ស្គូល ឌីស្ត្រីក មានវិធានការណ៍ ដើម្បីសុវត្ថិភាពនេះ ។ នេះគឺជាព្រឹត្តិការណ៍ដំបូងបង្អស់ ដែលសហគមន៍អាស៊ី ក្រោកឡើងដើម្បីការពារសហគមន៍ខ្លួន លើព្រឹត្តិការណ៍ដែលកើតឡើងជាប្រចាំច្រើនឆ្នាំមកហើយ នៅហ្វីឡាដែលហ្វៀ នេះ ៕ *(មាលា)*

## មាតិការឿង




## The Khmer Post Directory

**West Coast Publication**

Regional Editor : Sovannara Meach

**Phone: (562) 313-2129**

**Email: sovannara04@yahoo.com**

**East Coast Publication**

Regional Editor : Pin Samkhon

Email : pinsamkhon@gmail.com

**Writers :** Mam Yin

Kim Phean

Im Loeurm

Bopea Chum

**Advertising**

**Marketing Manager:**

**Sabane Thach**

**Phone : 267-253-3947**

**Email : sabane.thach@gmail.com**


# Philebrity.

**Philly Media, Gossip, Nightlife & Politics.**

## South Philly High Kids Go On Racist Rampage; Asian Students Recoil, Make Interim "Plan B"




Is there anything as devastatingly sad and bloodboiling-ly infuriating as *a racist child*? If there is, it'd be pretty hard to come by. So when news broke late Friday about 26 Asian students being attacked at South Philadelphia High School, we feasted on a series of reactions that ranged from disgust to concern to, finally, a kind of angry sadness. But then, you should have seen the other guys. Asian kids in the Philadelphia public school system have had this problem in fits and starts for quite some time now, and, without putting too fine a point on it, it is the shame of the City of Philadelphia that this problem has not been addressed in a definitive way sooner. And even as of this writing, the Mayor has yet to issue a statement on the matter, and what the City is doing about it. That absolutely needs to happen. Today. This isn't kids bullying other kids; this is systemic. And so while we're handing out blame, let's also throw some at the parents: No matter how screwed up your community is racially — and there are parcels of South Philadelphia where, even in 2009, battles are drawn along racial lines for who gets to be the king of Shit Mountain — every parent has a duty to the world to raise kids that are not going to go to school and beat up 26 kids because they're Asian.




# តើអាចមានរបបខ្មៅងងឹតវិលវិញឬទេបើសាលាក្តីខ្មែរក្រហមមិនបរាជ័យ?

**ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា**

•••នាយករដ្ឋមន្ត្រីខ្មែរលោក ហ៊ុន សែន ថ្មីៗនេះ បានថ្លែងព្រមានសាជាថ្មីម្តងទៀតថា កម្ពុជាសុខចិត្តឱ្យតុលាការខ្មែរក្រហមដែលមានចម្រុះសមាជិកពីអង្គការសហប្រជាជាតិបរាជ័យ តែមិនអនុញ្ញាតឱ្យរបបដ៏ខ្មៅងងិត គឺរបបខ្មែរក្រហមនោះត្រឡប់មកសារជាថ្មីឡើយ ។ ដោយប្រមុខរាជរដ្ឋាភិបាលរូបនេះបានចោទប្រកាន់ដោយរំលឹកពីអតីតកាលថា "ក្នុងពេលដែលពួកខ្មែរក្រហមកំពុងតែកាន់កាប់អំណាចមិនដែលបានឃើញអ្នកដែលប្រឆាំងនឹងរបបនេះងើតក្បាលទៅជួយប្រជាពលរដ្ឋខ្មែរដែលកំពុងតែដង្ហោយហៅរកការជួយសង្គ្រោះពីការកាប់សម្លាប់ និងក្នុងគុកឥតជញ្ជាំងនោះទេ" ។ ដោយលោក ហ៊ុន សែន បានថ្លែងកោតសរសើរចំពោះប្រទេសយួនថា ជាអ្នកមានគុណូបការៈជួយរំដោះខ្មែរឱ្យផុតពីការកាប់សម្លាប់រង្គាលផ្តាច់ផ្តិលជីវិតខ្មែរពីសំណាក់ពួកខ្មែរក្រហម ប៉ុល ពត នាឆ្នាំ1979 ។

ប៉ុន្តែក្នុងវិចារណកថាខ្មែរប៉ុស្តិ៍លេខនេះ យើងសូមបរិយាយដោយសុភវិនិច្ឆ័យក្រោមប្រធានបទថា **"តើអាចមានរបបខ្មៅងងិតវិលវិញឬទេ បើសាលាក្តីខ្មែរក្រហមមិនបរាជ័យនោះ ? ហើយបើកើតមានវាចេញមកតាមរបៀបរូបភាពណា ?**

គ្រប់កាលៈទេសៈនៅពេលនិយាយពីបញ្ហារឿងរ៉ាវនៃការកាត់ទោសពួកមេដឹកនាំខ្មែរក្រហម អ្នកដឹកនាំខ្មែរតែងតែរិះរកហេតុផលនយោបាយ ដើម្បីធ្វើជាប្រជាភិថុតក្នុងប្រជាប្រិយភាពខ្លួនជាជាងការគិត និងមិនចង់ស្វែងរកការពិតដើម្បីទុកជាប្រវត្តិសាស្ត្រនោះទេ ។ ហើយគេតែងតែយកបញ្ហាសង្គ្រាម សន្តិភាព ស្ថេរភាព សន្តិសុខ ធ្វើជាចំណាប់ខ្មាំងដើម្បីបិទបាំងបញ្ហាខ្លួនដែលបានធ្លាប់ជំពាក់ទៅនឹងនិន្នាការនយោបាយពីអតីតកាល គឺខ្មែរក្រហម" ។

ក្រុមខ្មែរក្រហម ប៉ុល ពត, នួន ជា, អៀង សារី និងក្រុមខ្មែរក្រហមពីគណបក្សប្រជាជនកម្ពុជាបច្ចុប្បន្នមាន ហ៊ុន សែន, ជា ស៊ីម និង ហេង សំរិន សុទ្ធតែជាអតីតសមមិត្តក្នុងសម្ព័ន្ធបក្សកុម្មុយនិស្តកម្ពុជា-ឥណ្ឌូចិនតែមួយ ដែលបង្កើតឡើងដោយក្រុមហាណូយ មាន ហូ ជីមិញ ជាមេក្លោង ។

សំណួរត្រូវចោទសួរថា ដើម្បីស្វែងរកយុត្តិធម៌ដល់ជនរងគ្រោះដែលបានស្លាប់ជិត 2លាននាក់ក្នុងរបបវាលពិឃាត3ឆ្នាំ 8ខែ 20ថ្ងៃ ចុះហេតុអ្វីបានជាលោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន បែរជាចង់ឱ្យតុលាការខ្មែរក្រហមបរាជ័យទៅវិញ ។ ដោយចម្លើយអ្នកវិភាគនយោបាយ និងអ្នកប្រវត្តិសាស្ត្របានផ្តល់អនុសាសន៍ប្រហាក់ប្រហែលគ្នាថា លោក ហ៊ុន សែន និងក្រុមគូកនក្នុងគណបក្សប្រជាជនកម្ពុជាសុទ្ធតែមានអ្នកជាប់ពាក់ព័ន្ធទៅនឹងការកាប់សម្លាប់រង្គាលពលរដ្ឋស្លូតត្រង់ ដែលកាលសម័យខ្មែរក្រហមកាន់កាប់អំណាចពួកគេ គឺសុទ្ធតែជាកម្មាភិបាលធំៗរបស់គណៈបញ្ជាការភូមិភាគបូព៌ាប៉ែកខាងកើតទន្លេមេគង្គ ។ ដោយស្លាកស្នាមអតីតកាលនេះ នឹងអាចធ្វើឱ្យពួកខ្លួនជាប់ជំពាក់ប្រឈមមុខនឹងការកោះហៅពីតុលាការខ្មែរក្រហមដើម្បីធ្វើជាសាក្សី ឬក៏អាចជាជនជាប់ចោទសំរាប់ការសាកសួរពីព្រះរាជអាជ្ញា ឬចៅក្រមក៏អាចថាបាន ។ ដូច្នេះការព្រួយបារម្ភនេះហើយដែលទាំងលោក ហ៊ុន សែន ក្តី ឬគណបក្សប្រជាជនកម្ពុជាក្តី ហាក់មានឆន្ទៈមិនចង់ឱ្យតុលាការខ្មែរក្រហមចម្រុះអន្តរជាតិកើតមានដើម្បីស្វែងរកភាពយុត្តិធម៌ជូនជនរងគ្រោះប៉ុន្មានទេ ? ដោយប្រមុខរដ្ឋាភិបាលខ្មែរ គឺលោក ហ៊ុន សែន តែងតែព្រមានជារឿយៗថា សុខចិត្តឱ្យសាលាក្តីខ្មែរក្រហមបរាជ័យ... ដោយមិនចង់ឃើញអស្ថិរភាពសង្គ្រាម និងខ្មែរក្រហមកើតមានវិញនោះទេ ! ។

ចំណុចនេះមានសំណួរជាច្រើនបានដាក់សួរមកខ្មែរប៉ុស្តិ៍ថាតើរបបខ្មៅងងិត គឺរបបខ្មែរក្រហមអាចកើតមានជាថ្មីតាមរូបភាពបែបណា ? ចម្លើយ គឺខ្មែរប៉ុស្តិ៍សូមបកស្រាយ ដើម្បីមិត្តអ្នកអានយកទៅពិចារណា ។

គ្រប់ៗគ្នាតែងតែឮនូវការថ្លែងរបស់លោក ហ៊ុន សែន ជាសាធារណៈចាប់តាំងពីឆ្នាំ 1996, 1998 និងមកដល់សព្វថ្ងៃដោយបង្ហាញថា **"នយោបាយឈ្នះ-ឈ្នះរបស់ ហ៊ុន សែន បានបញ្ចប់ដោយផ្តួលរលំទាំងស្រុងនៃរបបនយោបាយចាត់តាំងពួកខ្មែរក្រហមឱ្យខ្ទេចខ្ទីអស់ហើយ"** ។ ដូចជាការផ្តាច់ខ្លួននៃសមាហរណកម្មក្រុមខ្មែរក្រហមរបស់ អៀង សារី អតីតរដ្ឋមន្ត្រីការបរទេសរបប ប៉ុល ពត ក្នុង ឆ្នាំ1996 និងការផ្តាច់ខ្លួនចុងក្រោយបំផុតរបស់ នួន ជា, ខៀវ សំផន ក្នុងឆ្នាំ 1998 ការស្លាប់ ប៉ុល ពត នាថ្ងៃទី16 ខែមេសា ឆ្នាំ 1998 និងការចាប់ខ្លួនមេបញ្ជាការខ្មែរក្រហម គឺ តាម៉ុក នៅថ្ងៃទី6 ខែមីនា ឆ្នាំ 1999 ដោយកងទ័ពលោក ហ៊ុន សែន បានធ្វើឱ្យថ្នាក់ក្រោមខ្មែរក្រហមអស់ទឹកចិត្តតស៊ូប្រឆាំងនឹង ហ៊ុន សែន រួចក៏នាំគ្នាចុះចូលទាំងស្រុង ក្រោមនយោបាយត្រជាក់ ដោយលើកទឹកចិត្តផ្តល់លុយ, បុណ្យសក្តិ, ផ្ទះសម្បែង, ដីធ្លីឱ្យដល់ពួកខ្មែរក្រហមថ្នាក់ក្រោមបញ្ឈប់ការវិលទៅរកការតស៊ូប្រឆាំងវិញនោះ ។ ក្នុងខណៈដែលកងទ័ព Funcinpec ដែលស្មោះត្រង់នឹងព្រះអង្គម្ចាស់ នរោត្តម រណប្ញទ្ធិ អតីតសហនាយករដ្ឋមន្ត្រីទី1នាឆ្នាំ 1993-1997 ជាមួយមេទ័ព Funcinpec អតីតនាយអគ្គសេនាធិការរងទី1 គឺឧត្តមសេនីយ៍ ញឹក ប៊ុនឆៃ ត្រូវបានកំទេចឱ្យរលាយអស់នាអំឡុងរដ្ឋប្រហារបង្ហូរឈាមនាខែកក្កដា ឆ្នាំ 1997 ដោយនិយាយរួមមកគឺស្ថានការណ៍យោធាសឹកត្រូវលោក ហ៊ុន សែន និងគណបក្សប្រជាជនកម្ពុជា ក្តាប់សភាពការណ៍បានទាំងស្រុង ដោយគ្មានអ្នកណាម្នាក់អាចលេងសើច ឬធ្វើផ្គរធ្វើភ្លៀងជាមួយបុរសខ្លាំង ហ៊ុន សែន បានឡើយ ក្រៅតែពីរូបលោកចង់ធ្វើ ឬចង់បញ្ជាឱ្យសភាពការណ៍កើតមាន ឬមិនកើតមាននោះ ។ ដូច្នេះបញ្ហាទាំងអស់នេះគេមិនអាចជឿបានថា ខ្មែរក្រហមអាចកើតមានជាថ្មីបានទេ ព្រោះជាដំណាក់កាលចុងក្រោយពីតស៊ូក្នុងព្រៃដែលរស់នៅវេទនាស្ទើរតែពាក់កណ្តាលអាយុស្លាប់ទៅហើយ ។ ហើយបើប្រៀបមកសម័យកាលសព្វថ្ងៃ អតីតពួកខ្មែរក្រហមទាំងនោះបានជួបការសប្បាយជាមួយផ្ទះថ្មី គ្មានត្រង់សេ ឬគេចគ្រាប់រំសេវ មានឡានជិះ កន្លែងផឹកស៊ី មានស្រីស្នេហ៍ស្រស់ក្មេងកំដរ ជាមួយកន្លែងច្រៀងខារ៉ាអូខេ និងរាំរែកសប្បាយនៅតាមបាររាត្រីជាដើម ដោយសួរថា តើមានអ្នកណាដែលចង់វិលទៅរកសារធាតុដើម ដើររស់នៅតាមព្រៃភ្នំដូចសត្វស្វាទេ ? ។

ចំណុចមួយទៀតដែលលោក ហ៊ុន សែន បានដាក់ជាសំណួរសួរថា **"ក្នុងពេលដែលខ្មែរក្រហមកំពុងកាន់កាប់អំណាចមិនដែលឃើញ អ្នកប្រឆាំងនឹងរបបនេះ ឬអង្គការសហប្រជាជាតិងើតក្បាលទៅជួយប្រជាពលរដ្ឋខ្មែរ ដែលកំពុងតែដង្ហោយហៅរកការជួយសង្គ្រោះពីការកាប់សម្លាប់ និងក្នុងគុកឥតជញ្ជាំងទេ"** ។

ចម្លើយត្រូវបានឆ្លើយដោយអតីតអ្នកស្រាវជ្រាវផ្នែកច្បាប់ជាន់ខ្ពស់ គឺបណ្ឌិត ឡៅ ម៉ុងហៃ ធ្លាប់បានផ្តល់កិច្ចសម្ភាសន៍ឱ្យដល់ខ្មែរប៉ុស្តិ៍ដែល បានចោទសួរថា ដំណាក់កាលកើតមានការកាប់សម្លាប់រង្គាលពីសំណាក់ពួកខ្មែរក្រហម ទៅហើយម្តេចអង្គការសហប្រជាជាតិដែលជាម៉ែជាឪរបស់ប្រទេសកម្ពុជាមិនមកជួយអន្តរាគមន៍ ?

បណ្ឌិត ឡៅ ម៉ុងហៃ ថ្លែងថា ដោយយោងតាមឯកសារដែលមានក្នុងជំនាន់អគ្គលេខាធិការអង្គការសហប្រជាជាតិ (UN) គឺលោក Kurt Waldheim ដែលជាជនជាតិអូទ្រីស កាន់អំណាចពីឆ្នាំ 1972 ដល់ឆ្នាំ1981 ចន្លោះរបបខ្មែរក្រហមកាន់កាប់អំណាច មិនមែនអង្គការសហប្រជាជាតិ ឬសហគមន៍អន្តរជាតិមិនឈឺ ឆ្អាលនោះទេ ។ ពួកគេបានចោទសួរឧបនាយករដ្ឋមន្ត្រី និងជារដ្ឋមន្ត្រីការបរទេស អៀង សារី ពីបញ្ហាការកាប់សម្លាប់រង្គាល និងបានរៀបចំបង្កើតនូវគណៈកម្មាធិការអន្តរជាតិមួយដែលដឹកនាំដោយលោកអគ្គលេខាធិការអង្គការសហប្រជាជាតិផ្ទាល់ គ្រោងចុះមកស៊ើបអង្កេត និងក្តាប់សភាពការណ៍ពីបញ្ហានេះនៅថ្ងៃ ទី15 ខែមករា ឆ្នាំ 1979 ។ ប៉ុន្តែយុទ្ធសាស្ត្រនយោបាយយួនហាណូយ ដែលតាំទ្រនយោបាយពួកខ្មែរក្រហម តាំងពីដើមមកហើយ ដែលនៅទីបញ្ចប់មិនសប្បាយចិត្តនឹងក្រុមខ្មែរក្រហម ប៉ុល ពត, នួន ជា, ខៀវ សំផន ដែលចង់បានការក្តាប់អំណាចដោយឯករាជភាពខ្លួនឯង មិនដាក់កម្ពុជា ឬក្រុមខ្លួនឱ្យចំណុះក្នុងមាគ៌ាសហព័ន្ធឥណ្ឌូចិន ដែលមានយួនជាមេក្លោងនោះហើយ ដែលមេដឹកនាំយួនត្រូវតែយកឈ្នះក្រុម ប៉ុល ពត ឱ្យទាល់តែបាន ដោយបំបែកកម្លាំងខ្មែរក្រហម មាន ហេង សំរិន, ជា ស៊ីម និង ហ៊ុន សែន ឱ្យងាកចេញពីបន្ទាត់នយោបាយ ប៉ុល ពត ដែលយួនសន្យាថានឹងជួយវាយផ្តួលរលំ របប ប៉ុល ពត និងជួយការពារកម្ពុជាមិនឱ្យរបបខ្មែរក្រហមវិលវិញកើតមានជាថ្មី ហើយក្រុមខ្មែរក្រហមដែលស្ថិតក្នុងគណបក្សប្រជាជនកម្ពុជាតាំងពីឆ្នាំ 1951 របស់ ជា ស៊ីម, ហេង សំរិន, ហ៊ុន សែន ក៏ត្រូវបានសន្យាថា ឱ្យដឹកនាំប្រទេសកម្ពុជាដោយយួនវាយលុក ចូលទឹកដីកម្ពុជាមុនគម្រោងផែនការអង្គការសហប្រជាជាតិគ្រោងមកកាន់កម្ពុជា មុនមួយអាទិត្យ ដោយយួនកាន់កាប់ស្រុកខ្មែរនៅថ្ងៃទី7 មករា ឆ្នាំ 1979 រហូតដល់មានកិច្ចព្រមព្រៀងសន្តិភាពទីក្រុងប៉ារីស ឆ្នាំ 1991 ដែលយោធាយួនបានដកចេញពីប្រទេសកម្ពុជាទាំងស្រុងនៅឆ្នាំ 1989 ។

កន្លងមកសហចៅក្រមអន្តរជាតិលោក ម៉ាសែល ឡឺម៉ុង បានស្នើសុំឱ្យមានការកោះអញ្ជើញអតីតមេដឹកនាំខ្មែរក្រហមជាន់ខ្ពស់ និងជាមន្ត្រីគណបក្សប្រជាជនកម្ពុជាមានលោក ជា ស៊ីម ប្រធានព្រឹទ្ធសភា, លោក ហេង សំរិន ប្រធានរដ្ឋសភា, លោក ហោ ណាំហុង រដ្ឋមន្ត្រីក្រសួងការបរទេស. ***(តទៅទំព័រទី ១៧)***


ក្រុមហ៊ុនទេសចរណ៍ខ្មែរ
Since 1997
ក្នុង និងក្រៅប្រទេស
LOW FARE TRAVEL, NIC.
Domestic & International
OFFICE IN THE UNITED STATES
CALIFORNIA-FLORIA-ILLINIOS-N.COLOLINA-MASSACHUSET
មានសេវាបំរើ
-លក់សំបុត្រក្នុង/ក្រៅស្រុក
-ថតរូប Passport
-ធ្វើ Passport
-បកប្រែឯកសារ
-Lowyer referrals
1800 s. 15TH Street. . Philadelphia , PA 19145 USA
តម្លៃថោកពិសេសទៅស្រុកខ្មែរ,ឡាវ និង វៀតណាម
Special offers to Cambodia/Lao, Thai & Vietnam :
ទៅលេងស្រុកខ្មែរ......
មានតម្លៃពិសេសជូនលោក លោកស្រី លោកយាយ លោកតា បងប្អូន មីងមា ក្នុងឱកាសបុណ្យភ្ជុំបិណ្ឌ បុណ្យអុំទូក អកអំបុក និងសំពះព្រះខែ ។
សូមជ្រើសរើសយន្តហោះដែលលោក លោកស្រី លោកយាយ លោកតា បងប្អូន មីងមា ចង់ជិះធ្វើដំណើរតាមបំណង....
To book a reservation call @
PHONE 215-462-0886 / Cell 215-833-3669
ពេលម៉ោងបើកទ្វារពីម៉ោង ៤-៨ ល្ងាច ក្នុងមួយសប្តាហ៍ ហើយពីម៉ោង ១០-០៤ ល្ងាច សំរាប់ថ្ងៃសៅរ៍ ចុះតម្លៃពិសេស សំរាប់ធ្វើដំណើរទៅកាន់អាស៊ីអគ្នេយ៍
We're accepted all methods of payment. We're very Proud to serve you for the last 11 years, and your business with is highly appreciated

នាទីជំនួយស្មារតីគ្រួសារ

# រៀនសន្សំតក់ៗ


សូស៊ីមន ចាប

•••យោងតាមការពិសោធន៍របស់ខ្ញុំ និងការស្រាវជ្រាវដកស្រង់ពីការងារអ្នកឯកទេសគ្រួសារខ្លះ ការសន្សំតក់ៗ ដោយស្ងប់ស្ងាត់នេះ អ្នកណាក៏អាចធ្វើបាន ដោយគ្មាន ឋានៈ, វណ្ណៈ, មាន, ក្រ, ភេទប្រុសស្រី អាយុក្មេង ឬចាស់ពេកនោះទេ ទោះនៅតំបន់ណាក៏ដោយ សម្រេចទៅលើសណ្ដានចិត្ត ចរិត និងសេចក្ដីអត់ធ្មត់របស់បុគ្គលម្នាក់ៗ ជាពិសេសគ្មានពេលវេលាកំណត់ផង ។ អ្នកអាចសម្រេចចិត្តចាប់ផ្ដើម ឬបញ្ចប់នៅពេលវេលាក៏បាន តែអ្នកគួរសម្រេចចិត្តចាប់ផ្ដើមសាកល្បងរឹតតែឆាប់ រឹតតែប្រសើរ... ធ្វើទៅហើយ តើមានការពិបាកឬទេ ឬក៏មានការផ្លាស់ប្ដូររបៀបចាយវាយក្នុងផ្ទះយ៉ាងណាខ្លះ ?

**1- ការសន្សំប្រាក់ពីមួយសេន** (penny) **ឡើងទៅ** : ខ្ញុំសង្កេតឃើញថា នេះជាទម្លាប់ល្អមួយ ហើយក៏អាចជាជំនួយដល់ថវិកាគ្រួសារផងដែរ ។

**ឧទាហរណ៍** : អ្នករើសបានកាក់នៅលើថ្នល់ ឬនៅកន្លែងផ្សេងៗ កុំខ្លាចគេសើចចំអក សូមធ្វើដោយធម្មតា ហើយបន្តបេសកកម្មសន្សំម្ដងមួយសេនៗ តទៅទៀត ដោយស្ងប់ស្ងាត់ ។



គិតជាលេខ សន្សំមួយសេន x 100 ដង ត្រូវស្មើមួយដុល្លារ ($1) ។ យក $1 ទៅទិញរបស់ប្រើប្រាស់ខ្លះបាន - នៅ "Dollar Store" ។ ដូចជាទិញថង់សំរាម ឬអ្វីផ្សេងៗទៀតក៏បាន ។

នៅពេលខ្លះ កាក់ដែលសន្សំតក់ៗនោះ អាចជួយសម្រាលភាពអាសន្នម្ដងៗបាន ជួនកាលក៏អាចជួយស្រោចស្រង់ជីវិតបានដែរ ។

**ឧទាហរណ៍** : មានមនុស្សអាក្រក់ចូលមកប្លន់ក្នុងផ្ទះមួយ ពួកគេសង្ឃឹមនឹងមានលាភ ដោយមុខជាប្រទះវត្ថុមានតម្លៃច្រើន តែផ្ទុយទៅវិញ នៅក្នុងផ្ទះនោះ គ្មានរបស់អស់នោះទៅវិញ ដើម្បីកុំឱ្យស៊ិយពួកគេយកកាក់ ដែលសន្សំនៅក្នុងធុងមួយ (Jar) ជំនួស ហើយដើរចេញទៅ ដោយពុំបានធ្វើទារុណកម្មធ្ងន់ធ្ងរដល់អ្នកផ្ទះ ។ រឿងនេះកើតឡើងចំពោះខ្លួនខ្ញុំផ្ទាល់តែម្ដង កាលពីឆ្នាំមុន ។

យើងនឹកទៅដល់កម្មករក្រីក្រនៅស្រុកខ្មែរ ដែលធ្វើការជាទម្ងន់យ៉ាងខ្លាំងៗ ពេញ ១ថ្ងៃ ចាប់ផ្ដើមតាំងពីព្រលឹម រហូតដល់ពេលព្រលប់ គេរកមិនបានប្រាក់ $1ផង ហេតុដូច្នេះ បើសន្សំតក់ៗ ពីមួយសេនទៅ ក៏មានប្រយោជន៍ដែរ ។ បើខ្ជិលរាប់សេន នោះនៅតាម Bank ធនាគារគេមានម៉ាស៊ីនសម្រាប់រាប់កាក់ ដូច្នេះ វាមិនជាការពិបាកទេ ។

**២- ការសន្សំតក់ៗ ដោយរៀនប្រើក្រដាស** Coupon **ដែលកាត់ចេញពីក្រដាសផ្សាយពាណិជ្ជកម្ម, នៅក្នុងសារព័ត៌មានចេញថ្ងៃអាទិត្យ** (Sunday) **ឬចេញពី** Internet.

**ឧទាហរណ៍** : នៅក្នុងអាទិត្យ 11/29 - 12/05/09 នៅហាង Wall Green មាន Coupon ដែលអាចទិញសាប៊ូ Soft Hand Soap 6402. $4.99... តម្លៃគ្មាន Coupon $7.35 ។ ទឹកឃ្មុំ Pare Honey 3202. $3.99... តម្លៃគ្មាន Coupon $5.99 ។ ការរៀនប្រើ Coupon អ្នកអាចសន្សំប្រាក់បានខ្លះ ដោយមិនខ្លួន ។ នេះជាជំនួញសំរាល ថវិកាគ្រួសារដែរ ជាពិសេសរបស់ដែលមានដូចខាងលើនេះ ជារបស់ដែលត្រូវការចាំបាច់សំរាប់ប្រើប្រាស់ប្រចាំថ្ងៃក្នុងគ្រួសារ ហើយទុកបានយូរ មិនផ្លាស់ប្ដូរគុណភាព ការប្រើ Coupon នេះ ក៏ត្រូវប្រើទៅលើរបស់ដែល ត្រូវការជាចាំបាច់ មិនមែនចេះតែ យកមកទុកគរ ចោលហួសថ្ងៃ, ខែ, ឆ្នាំ ដែលប្រើបាននោះទៅជាអត់ប្រយោជន៍ ហើយខាតទៅវិញ ។

**3- ការសន្សំតក់ៗ ដោយប្រៀបធៀបតម្លៃខុសគ្នាពីហាងមួយទៅហាងមួយទៀត** : អ្នកត្រូវប្រើស្មារតីឱ្យបានឈ្លាសវៃបន្តិចដែរ គឺត្រូវពិនិត្យ, ត្រូវប្រៀបធៀបនូវគុណភាព, តម្លៃចំពោះរបស់ដែលអ្នកត្រូវការនោះ ជាមួយតម្លៃដែលលក់ចុះថ្លៃឱ្យបានច្បាស់នឹងទៅតាមហាង (Store) នីមួយ ។

ឧទាហរណ៍ : " Triplex " ថ្នាំឈឺក្បាល

-ផលិតនៅ " Nature Made " ដូចគ្នា

-មានចំនួន " 120 Tablet " ដូចគ្នា

-មានគុណភាព " ល្អ " ដូចគ្នា

-លក់ (ទិញមួយថែមឱ្យមួយ ដោយឥតគិតថ្លៃ "Buy 1 get another 1 free" ដូចគ្នា ។

តែនៅឱសថស្ថានទី1 តម្លៃ $44.99

តែនៅឱសថស្ថានទី2 តម្លៃ $39.99 តែត្រូវប្រើ Store Card.

4. **ការសន្សំតក់ៗ ដោយប្រើកាត** : គឺត្រូវមានកាត (Store Card) ដែលចែកជូនតាមឱសថស្ថាន និង Supermaket ។ ភាគច្រើនគេចង់ឃើញភ្ញៀវរបស់គេប្រើ Store Card នេះ ឯការដាក់ពាក្យសុំនោះ ដូចជាពុំមានត្រូវចំណាយប្រាក់កាក់ទេ គេពួកត្រូវការតែឈ្មោះ និងអាស័យដ្ឋានតែប៉ុណ្ណោះ ។




បើអ្នកមាន Card នេះហើយ គួរដាក់ឱ្យជាប់ជាមួយសោរផ្ទះ ឬសោររថយន្ត ពេលទៅផ្សារអ្នកមានរបស់ប្រើជាស្រេច ។ ការប្រើ Store Card នេះអ្នកអាចចំណេញប្រាក់បន្តិចបន្ថែមទៀត ទៅលើទំនិញលក់ចុះថ្លៃរួចហើយ ។




ជាព័ត៌មាន បន្ថែម Shop Rite មានរង្វាន់លើកទឹកចិត្តដល់ភ្ញៀវទូទៅ ដោយចុះថ្លៃជូន :

- ពីរសេន 2¢ off ចំពោះភ្ញៀវដែលបានយកថង់ដាក់ទំនិញចាស់ Old Shop Rite Shopping Bag មកប្រើជាថ្មី ឬ បួនសេន 4¢ off សំរាប់ចំនួនពីរ និងតទៅទៀត...

-ប្រាំសេន 5¢ off ចំពោះភ្ញៀវណាដែលប្រើថង់ក្រណាត់ ឬ Reuable Bag.

-ចុះថ្លៃ 5% off នៅរៀងរាល់ថ្ងៃអង្គារ ចំពោះភ្ញៀវទូទៅណាដែលមានវ័យលើសពី 55 ឆ្នាំឡើងទៅ ។ ប្រសិនបើអ្នកគិតលុយភ្លេច សុំនិយាយប្រាប់គេថា សុំឱ្យចុះថ្លៃដល់មនុស្សចាស់ "Senior Citicen Discount Please".

5- **របៀបសន្សំ ដោយកំណត់ត្រាចំណាំ** :

BUY ONE GET SECOND ONE FREE

Lysol Toilet Bowl Cleaner 24 oz., Sanitizing Wipes 28 or 35 ct. All Purpose Cleaner Pour - 40 oz., Trigger - 32 oz. or Kitchen Trigger - 22 oz.

គឺធ្វើបញ្ជីកត់នៅលើក្រដាសណាមួយសន្លឹក ពីឈ្មោះរបស់ដែលត្រូវការជាចាំបាច់ ហើយនឹងឈ្មោះ Store ណាដែលមានរបស់នោះ លក់ចុះថ្លៃ បន្ទាប់មករបសផ្សេង ៗទៀត ទៅតាម លេខរៀង រៀបចំទុកឱ្យស្រេចមុនពេលចេញដំណើរ ធ្វើដូច្នេះវាចំណេញពេលវេលាមិនពិបាកដើរគិត ឬក៏ភ្លេច ។ ចំពោះទំនិញចុះថ្លៃ ត្រូវមានការប្រុងប្រយ័ត្ន ពិនិត្យពីគុណភាព និងកំណត់ថ្ងៃដែលអាចទុកបាន ដូចជា សាច់, របស់ខ្លះលក់ទៅតាមក្រុមហ៊ុន មានឈ្មោះល្បី Brain Name ដូចជា :

- Store Old Fashioned Oats 4202. $2.00

-Quaker Oats 4202. $4.00

របស់ពីរ គុណភាពដូចគ្នា តម្លៃខុសគ្នាច្រើន ។

បន្ទាប់ពីដើរផ្សារទិញម្ហូប និងរបស់ប្រើប្រាស់អស់មួយថ្ងៃពេញ នៅពេលមកដល់ ផ្ទះ វិញ ប្រសិនជាមានពេលទំនេរ គួរពិនិត្យនូវចំនួន ប្រាក់ ដែលសន្សំតក់ៗ បានក្នុងថ្ងៃនេះ តើមានចំនួនប៉ុន្មាន ? កត់ទុកក្នុងបញ្ជីសៀវភៅមួយ រួមជាមួយ Receipts រួចបន្តការសន្សំតក់ៗ តទៅទៀត រហូតដល់ពេលចុងខែ ឬចុងឆ្នាំ មានឱកាសល្អទាញបញ្ជីកំណត់នោះមកបូករួមមើល នៅពេលនោះអ្នកមុខជាមានការភ្ញាក់ផ្អើលរំភើបជាខ្លាំង ដោយមិនគួរជឿសោះថា ការសន្សំតក់ៗ មានកំរិតខ្ពស់ដល់ប៉ុនណានោះ ។ បន្ទាប់មកគួរអ្នកសន្យាក្នុងចិត្តខ្លួនឯងថា នៅពេលខែថ្មី ឬឆ្នាំថ្មី និងធ្វើការសន្សំនេះ ឱ្យកាន់តែបានល្អជាងនេះទៀត ។ ជាបន្ថែមអ្នកមុខជាមានសេចក្ដីជ្រះថ្លានឹងផ្សាយសេចក្ដីសប្បាយនេះ ទៅដល់គ្រួសារ មិត្តភ័ក្តិ ឱ្យពួកគេចេះចាប់ផ្ដើមរៀនសន្សំតក់ៗ ដូចអ្នកអញ្ចឹងបាន ॥

From :Philadelphia

សួស្ដីឆ្នាំថ្មី

ហាងខ្មែរជួសជុលរថយន្ត

បើចង់ឱ្យរថយន្តលោកអ្នករត់បានល្អ សូមអញ្ជើញ

Rathe`s Auto Service

Rathe's Auto Service

State and Emission
Inspection General
Repairs and Maintenance

MON-SAT, 8:30AM -5:30PM
SUN. EMERGENCY ONLY

-ជាងមានបទពិសោធន៍ជាយូរឆ្នាំ -ជួសជុលរថយន្តគ្រប់ប្រភេទ
-មានដូរប្រេង ដូរប្រ៉ាំង ដូរកង់ និងករណីជាច្រើនទៀត ។
-មានត្រួតពិនិត្យគ្រឿងម៉ាស៊ីន DIAGNOSTICS ដោយឥតគិតថ្លៃ -មានចុះថ្លៃពិសេស ចាប់ពីខែកុម្ភៈ ២០០៨
ទៅ : -ដូរប្រេងកំរិត ៥ ក្វាត $22. - INSPECTIONS រថយន្តឆ្នាំ 96 up $49.99+ ពាក់-មានជូនប័ណ្ណពិសេស សំរាប់ដូរប្រេង ចុះថ្លៃពាក់កណ្ដាល នៅពេលយកមកជួសជុលអស់តម្លៃ $150.
-តម្លៃជួសជុលទូទៅ សមរម្យ ដោយទាបជាងហាងជួសជុលផ្សេងៗទៀត
- ប្ដេជ្ញាចិត្តធ្វើជូនដោយហ្មត់ចត់ គុណភាពខ្ពស់ មិនឱ្យខុសបំណងលោកអ្នកឡើយ ។
ពិសេស ជួយទៅពិនិត្យដល់កន្លែងនូវរថយន្តណាដែលខូច STARTER ឬធុងអាគុយអស់ភ្លើងដោយឥតគិតថ្លៃ ។ *សូមអរគុណ !*

5105 N.2ND ST., PHILADELPHIA, PA 19120. TEL: (215) 329-2418
Fax: (215) 329-2419.Rath CELL: (215) 431-6376




ដោយ : គឹម ភៀន (តពីលេខមុន)

•••លោកអនុសេនីយ៍ឯកវិរៈសម្លឹងមុខលោកថៅកែងួនហាក់ដោយក្តីអាណិត :

- មិនអីទេលោកអ៊ុំ ខ្ញុំនឹងខំជួយលោកអ៊ុំដោយប្រឹងប្រែងបំផុត អ៊ុំប្រាប់ឱ្យច្បាស់លាស់មក តើខ្ញុំអាចជួយធ្វើអីបានសម្រាប់អ៊ុំ ?

- លោកធំ! ខ្ញុំមានកូនប្រុសតែមួយគត់ វារៀនពូកែល្បីណាស់នៅវិទ្យាល័យតាំងគោកនេះ វាជិតប្រឡងបាក់ឌុបហើយ ស្រាប់តែពួកម៉ាក់វាបញ្ឆោតឱ្យទៅតាមវា ហើយវានាំទៅឱ្យខ្មែរក្រហមម្នាក់នៅក្បែរវត្ត ក្នុងផ្ទះមួយ...ខាងលិចវត្ត...

- វាបញ្ឆោតយកកូនអ៊ុំទៅពីអង្កាល់ ?

- ព្រឹកមិញណឹងលោកធំ ប្រហែលមុននេះមួយម៉ោងលោកធំ។ វិរៈហាក់ដូចងឿងឆ្ងល់ស្ទើរជឿបន្តិចមិនជឿបន្តិច ។ ឬក៏ថៅកែងួនហាក់ចង់លេងល្បិចអីទេដឹង ។

- ម៉េចក៏លោកអ៊ុំបានដំណឹងនេះរហ័សម្លេះ ? លោកថៅកែកំពុងតែចាំឆ្លើយសំនួរផង ក៏រៀបរាប់យ៉ាងរហ័ស គ្មានអាក់ :

- មានអ្នកស្រុកនៅជិតវត្តចាស់គាត់មកប្រាប់ខ្ញុំ គាត់រកស៊ីជាមួយខ្ញុំ ខ្ចីលុយបុលប្រាក់ខ្ញុំ យូរៗទៅរាប់អានគ្នាដូចបងប្អូន ។ គាត់ស្គាល់កូនខ្ញុំច្បាស់ព្រោះធ្លាប់ចេញចូលលក់ដូរជាមួយគ្នា ។ ពួកម៉ាក់វាឈ្មោះ វ៉ាន់កាំ ជាសិស្សរួមថ្នាក់ទី១២"ក" ។ ព្រឹកមិញអាវ៉ាន់កាំយកម៉ូតូ៩០របស់វាទៅឌុបកូនប្រុសខ្ញុំពីផ្ទះនៅឯផ្សារតាំងគោក ថាទៅរៀនទាំងអស់គ្នា តែវាបែរជាឌុបកូនខ្ញុំគេចសាលាតម្រង់ទៅខាងលិចវត្តចាស់ទៅវិញ។ វិរៈ សញ្ជឹងគិតមួយសន្ទុះ ក៏សួរទៅថៅកែ ងួនហាក់ភ្លាម :

- ចុះគ្រាន់តែឃើញអាក្មេងឈ្មោះ វ៉ាន់កាំ នោះឌុបកូនអ៊ុំភ្លាមម៉េចក៏ហ៊ានចោទថាគេបញ្ឆោតកូនអ៊ុំយកទៅឱ្យខ្មែរក្រហម ?

- អ្នកស្រុកនៅជិតខាងនោះ គេមកប្រាប់ខ្ញុំ ដែលខ្ញុំបានជម្រាបលោកធំហើយ ។ អាវ៉ាន់កាំនោះ វាឌុបកូនខ្ញុំទៅដល់ផ្ទះមួយខាងលិចវត្តចាស់ វានាំគ្នាចូលលេងផ្ទះនោះមួយផ្លែត គេឃើញអាវ៉ាន់កាំចេញមកតែម្នាក់ឯង រួចឡើងម៉ូតូជិះត្រឡប់មកក្រោយយ៉ាងលឿន។

- លោកអ៊ុំមានដឹងអាក្មេងឈ្មោះ វ៉ាន់កាំនេះនៅឯណាទេក្នុងពេលនេះ ?

- មិនដឹងដែរទេលោកធំ តែប្រហែលវានៅក្នុងថ្នាក់រៀន ដើម្បីកុំឱ្យមានការសង្ស័យលើរូបវាពីការអវត្តមានរបស់កូនខ្ញុំ ។ ត្រិះរិះមួយសន្ទុះ លោកស័ក្តិ៣ វិរៈ ធ្វើមុខមាំ :

- សុំឱ្យខ្ញុំបានជួបអ្នកស្រុកដែលបានផ្តល់ដំណឹងឱ្យអ៊ុំនោះ ដើម្បីខ្ញុំបានសាកសួរព័ត៌មានបន្ថែម ។

ថៅកែ ងួនហាក់ មានទឹកមុខប្រែប្រួលបន្តិចដោយខំប្រមូលអារម្មណ៍ :

- ជំរាបលោកធំ អ្នកស្រុកនោះកំពុងពួនសម្ងំនៅក្នុងផ្ទះខ្ញុំ តែដើម្បីសុវត្ថិភាពរបស់គាត់ខ្ញុំសុំលោកធំកុំជួបគាត់ល្អជាង ព្រោះយប់ៗពួកខ្មែរក្រហមអាចចេញចូលមកធ្វើបាបគាត់បានគ្រប់ពេល ព្រោះខាងយើងការពារអ្នកស្រុកបានតែពេលថ្ងៃតែប៉ុណ្ណោះ ។ សំដីនេះធ្វើឱ្យ វិរៈ យល់បន្ថែមពីស្ថានភាពសន្តិសុខសព្វថ្ងៃ។ គេសួរព័ត៌មានយ៉ាងល្អិតល្អន់ពីផ្ទះដែលកំពុងឃុំខាំងកូនប្រុសលោកថៅកែ ពីឈ្មោះនឹងអាយុរបស់កូនប្រុសគាត់ ហើយក៏និយាយយ៉ាងម៉ឺងម៉ាត់ថា :

- លោកអ៊ុំ! លើកក្រោយមានការអ្វីក៏ដោយសុំអ៊ុំមេត្តាទៅទាក់ទងនឹងលោក កុម្មង់ដង់ស៊ុប កុំឱ្យគាត់អន់ចិត្តថា បោះសន្ទូចរំលងភ្នំ ។ តែលើកនេះបន្ទាន់ណាស់ ប្រយ័ត្នពួកវារំដោះកូនអ៊ុំទៅបាត់ ។ អ៊ុំនៅក្នុងបន្ទាយនេះកុំចេញទៅណាឱ្យសោះ ចាំមានបញ្ជាពីខ្ញុំទើបអ៊ុំអាចត្រឡប់ទៅផ្ទះ ឬទៅទីណាៗបាន ។ និយាយចប់ភ្លាម វិរៈ បញ្ជាឱ្យកូនទាហាន ២ នាក់ មកអង្គុយសំណេះសំណាលជាមួយភ្ញៀវ ឯខ្លួនឯងវិញដើរចេញតម្រង់ទៅការិយាល័យលោកមេបញ្ជាការណែខុន ដើម្បីសុំយោបល់ ។

បន្តិចក្រោយមករថយន្តស៊ីបមួយគ្រឿង បានបើកចេញពីបន្ទាយ មានកូនទាហាន ៣ នាក់ប្រដាប់ដោយកាំភ្លើង និងគ្រាប់បែកគ្រប់ដៃអង្គុយនៅបង់ខាងក្រោយ ឯ វិរៈ អង្គុយក្បែរកូនចៅជំនិតម្នាក់ជាអ្នកបើកបរតម្រង់ទៅវិទ្យាល័យតាំងគោក ។ ជាងមួយម៉ោងក្រោយ មានរថយន្តស៊ីប២គ្រឿងបរត្រឡប់ចូលបន្ទាយវិញ ។ រថយន្តស៊ីបទីពីរនេះជារថយន្តជំនួយបន្ថែម បានត្រឡប់មកវិញជាមួយគ្នាក្រោយពីប្រតិបត្តិការណ៍ "ផ្លែកបន្ទោរ"មក ព្រមទាំងមានផ្ទុកបន្ថែមមនុស្សចំឡែក៤នាក់មកជាមួយផង ។ ក្នុងចំណោមមនុស្ស៤នាក់នោះ មាន៣នាក់ជាមនុស្សមានទោស ត្រូវចងស្លាបសេក បោះជំហ៊ានចុះពីរថស៊ីបម្តងមួយៗដោយមានទាហានផ្ទង់កាំភ្លើងការពារកុំឱ្យរត់ ។ អ្នកទី៤ ឥតជាប់ចំណងជាអ្នកត្រូវគេចាប់ពង្រត់នោះ គឺកូនប្រុសលោក ងួនហាក់ ឈ្មោះ ងួនឡេង ។

(សូមរង់ចាំអានភាគបន្តនៅលេខក្រោយ)

# ឆ្លើយតបសំនួរមិត្តអ្នកអាន



(តពីលេខមុន)

ដោយ : គឹមភៀន

•••មិត្តអ្នកអានជាទីរលឹក ! ចាប់ផ្តើមពីពេលនេះ ទៅខ្ញុំនឹងខំឆ្លៀតយកភាពមានប្រយោជន៍នៃការរៀនសូត្ររបស់ខ្ញុំក្នុង "វ័យទៅព្រេច"=វេចទៅព្រៃ=ចាស់ជរា=ជិតដល់ពេលគេយកទៅចោលក្នុងព្រៃ) នេះមកបង្ហាញជូនមិត្តអ្នកអាន ដូចដែលខ្ញុំបានសន្យា ថាមិនមែនមានប្រយោជន៍តែខ្ញុំជាអ្នកទៅរៀននោះទេ តែខ្ញុំនឹងចែកប្រយោជន៍ទាំងនោះ ដល់មិត្តអ្នកអានទាំងអស់ស្មើៗគ្នាដែរ ឱ្យតែមិត្តអ្នកអានណាចង់ទទួលបានផលប្រយោជន៍ទាំងនោះ ។ ហេតុនេះចំណងជើងនៃអត្ថបទបន្តទៅនឹងប្រែមកជា "ផលប្រយោជន៍នៃការសិក្សា" ហើយចំណងជើងនេះនឹងផ្លាស់ប្តូរជានិច្ចទៅតាមសាច់រឿងនិមួយៗ។ ខ្ញុំមានបំណងចង់និទានរឿងពិត ដែលខ្ញុំបានសិក្សាក្នុងកំឡុងពេលជិត២ត្រីមាសនេះ ៧ខែ) មកជូនលោកអ្នកស្តាប់ និងពិចារណា ហើយគ្រេបយករសជាតិ ឬអត្ថរសរបស់រឿងទាំងនោះ មកធ្វើជាឧត្តមគតិ ដើម្បីដឹកនាំជីវិតរបស់យើងឱ្យទៅកាន់ភាពប្រសើររុងរឿង មុននឹងចាកលោកនេះទៅ ។ ខ្ញុំគ្មានគំនិតបកប្រែរឿងដើម្បីអស់លោកអានកំសាន្តប្រាជ្ញានោះទេ តែបកស្រាយសាច់រឿង រើសចំណុចសំខាន់មកបរិយាយ រើសយកហេតុការណ៍សំខាន់ៗមកលាតត្រដាង ដើម្បីយើងយកមកអនុវត្តន៍សម្រាប់ឱ្យខ្លួនយើង ឱ្យមនុស្សខ្មែរយើងយកមកប្រើបានជាប្រយោជន៍សម្រាប់ខ្លួននិងជាតិខ្លួនផងដែរ ។ វិធីសាស្ត្រសរសេររបៀបនេះគេឱ្យឈ្មោះថាបកស្រាយរឿង (Interpretation) ហើយអ្នកបកស្រាយរឿងគេហៅថា (Interpretor) មិនមែន "ចឹបក" ឬជាអង្គលេសហៅថា "translator" នោះទៅវិញទេ ។

ជិត២ត្រីមាសនេះ ខ្ញុំខំសិក្សាបានរឿង៣ សុទ្ធតែមានប្រយោជន៍ដ៏អស្ចារ្យ សុទ្ធតែជារឿងពិត Real stories or the non fiction stories) ។ អ្នកនិពន្ធកំពុងនៅមានជីវិតរស់នៅនៅឡើយ ឯតួអង្គក្នុងសាច់រឿងទាំងនោះភាគច្រើនកំពុងនៅមានជីវិត ហើយមានអាស័យដ្ឋានអាចសួរនាំបាន មានវែពសាយត៍អាចស្រាវជ្រាវរកបាន ប្រសិនបើយើងមានការងឿងឆ្ងល់ចង់សាកសួរ ។ រឿងទាំង៣នោះគឺ :

១- Three Cup of Tea ។ ២- Think Big. 3- Soloist ។ ដែលខ្ញុំសុំបកមកជាភាសាខ្មែរថា :

១- ទឹកតែ៣ពែង ។ ២- ឧត្តមគតិក្នុងការគិត ។ ៣- អ្នកចាប៉ីដៃទោល ។

សុំរង់ចាំអាន" ទឹកតែ៣ពែង" ក្នុងលេខបន្ត ។


ANGKOR AUTO SERVICE, INC.

ហាងជួសជុលរថយន្ត "អង្គរ"

4835 N. 16th Street.
Philadelphia, Pa 19141

Tel : (215) 455-7810
Ricky : (215) 485-1425

Specializing in Body Kit and Custom Paint

ជំនាញខាងជួសជុលតួរថយន្ត
និងបាញ់ថ្នាំដាក់ក្បាច់តាមបំណងភ្ញៀវ

RICKY
Hand Ph.: Ricky 215-485-1425

មុនពេលជួសជុល

ក្រោយពេលជួសជុល

មានបទពិសោធន៍២០ ឆ្នាំ
ជាជាងរថយន្តមានសញ្ញាប័ត្រ
វាយតម្លៃការងារដោយឥតយកថ្លៃ
ហើយយើងជួយសន្សំប្រាក់តម្លៃ
បន្ថយរបស់អ៊ីនសួរិន បានផង
យើងផ្តល់សេវាគ្រប់យ៉ាង :
-State inspection
-Insurance Claims
-Auto Glass Repairs
-Auto Frame Repairs
-Custom Painting
-Auto A/C

បើកពីម៉ោង ៩ ព្រឹក
ដល់ម៉ោង៥ល្ងាច ពីថ្ងៃ
ច័ន្ទ ដល់ ថ្ងៃ សៅរ៍

ចុះតម្លៃជូន 10 % បើបង្ហាញប័ណ្ណពាណិជ្ជកម្មនេះ



សេចក្តីជូនដំណឹង

យើងខ្ញុំមានទទួល Design ដូចជា :

Design Business Card, Poster, Invitation, Leaflet, Advertising, Menu & Much more

បើលោក លោកស្រីមានបំណងទទួលនូវសេវាកម្មណាមួយ សូមទំនាក់ទំនងមកយើងខ្ញុំៗ នឹងធ្វើជូនយ៉ាងរហ័សទាន់ចិត្ត ឌ សុបិន : (267) 253-3947

# លោក ជីមី ខាធី អតីតប្រធានាធិបតីអាមេរិក ផ្ទះ21 ខ្នងដល់ជនក្រីក្រកម្ពុជា



លោក ជីមី ខាធី នៅទីស្តីការដ្ឋមន្ត្រី

**កណ្តាល, ខ្មែរប៉ុស្តិ៍ : ចាន់ កុសល**

•••លោក ជីមី ខាធី អតីតប្រធានាធិបតីអាមេរិក បានធ្វើដំណើរមកកាន់ប្រទេសកម្ពុជា ផ្នែកការងារមនុស្សធម៌រយៈពេលខ្លី ដើម្បីប្រគល់ផ្ទះចំនួន21ខ្នង ដល់សហគមន៍ក្រីក្រ ជីវិតថ្មីឱ្យមានលំនៅឋានរស់នៅសមរម្យនឹងគេ ។ ក្នុងពិធីសម្ពោធសមិទ្ធផលលំនៅ-ឋាននេះ ក៏មានការចូលរួមពីមន្ត្រីជាន់ខ្ពស់របស់រាជរដ្ឋាភិបាល និងអង្គការសង្គមស៊ីវិលមួយចំនួនទៀតផង ។

លោក ជីមី ខាធី ធ្លាប់ធ្វើជាប្រធានាធិបតីអាមេរិកពីឆ្នាំ 1977-1981 និងទទួលបានរង្វាន់ណូបែលសន្តិភាព បានបំពេញការងារមនុស្សធម៌នៅជុំវិញពិភពលោកក្នុងការជួយសង្គ្រោះដល់ជនក្រីក្រមិនរើសមុខ ។ ក្នុងពិធីប្រគល់ផ្ទះដល់ជនក្រីក្រសហគមន៍ជីវិតថ្មី ដែលមានអ្នកស្ម័គ្រចិត្តមកពីកន្លែងចាក់សំរាមស្ទឹងមានជ័យជាយក្រុងភ្នំពេញនោះ លោក ក៏ បានថ្លែងអំណរគុណយ៉ាងជ្រាលជ្រៅចំពោះក្រុមមន្ត្រីអ្នកសាងសង់ផ្ទះសម្បែង អ្នកស្ម័គ្រចិត្តរស់នៅទីនេះ និងមន្ត្រីរដ្ឋាភិបាលនៃប្រទេសកម្ពុជាផងដែរ ។

លោក ជីមី ខាធី មិនបាននិយាយពីបញ្ហានយោបាយនោះទេ គឺលោកបានសង្កត់ធ្ងន់ទៅលើការងារមនុស្សធម៌ប៉ុណ្ណោះ ដោយលោកធ្វើការលើកទឹកចិត្តដល់សហគមន៍ក្រីក្រទាំងនោះឱ្យចេះតស៊ូក្នុងជីវិត ដើម្បីសុភមង្គលដល់ក្រុមគ្រួសារ និងរួមចំណែកកាត់បន្ថយភាពក្រីក្រដល់រាជរដ្ឋាភិបាល ។



អតីតប្រធានាធិបតី ស.រ.អា លោក ជីមី ខាធី សម្ពោធផ្តល់ផ្ទះដល់ជនក្រីក្រ





លោក ជីមី ខាធី ក្នុងសកម្មភាពមនុស្សធម៌ជួយសង់ផ្ទះ

លោក សុខ អាន រដ្ឋមន្ត្រីទីស្តីការគណៈរដ្ឋមន្ត្រី ដែលអមដំណើរជាមួយនឹងអតីតប្រធានាធិបតីអាមេរិកក្នុងគ្រានោះក៏បានថ្លែងថា ដំណើរទស្សនកិច្ចមនុស្សធម៌របស់លោក ជីមី ខាធី ពិតជាមានសារៈសំខាន់ខ្លាំងណាស់ សម្រាប់ប្រទេសកម្ពុជា ។ ជាពិសេសពង្រឹងកិច្ចទំនាក់ទំនងសហប្រតិបត្តិការរវាងប្រទេសទាំងពីរឱ្យប្រសើរឡើងចំពោះការកាត់បន្ថយភាពក្រីក្រវាជាអាទិភាពចម្បងរបស់ប្រទេសកម្ពុជាដែលកំពុងប្រយុទ្ធប្រឆាំងយ៉ាងខ្លាំង ។

លោក សុខ អាន បន្តថា នេះជាទឹកចិត្តសប្បុរសធម៌ដ៏ថ្លៃថ្លារបស់លោក ជីមី ខាធី ដែលបានចូលរួមចំណែកជាមួយអង្គការលំនៅឋានមនុស្សជាតិ (Habitat for Humanity) ក្នុងការកសាងលំនៅឋានជូនប្រជាពលរដ្ឋកម្ពុជា ដើម្បីបំពេញតាមតម្រូវការខ្វះខាតរបស់មនុស្សជាតិនោះ ។ ជាមួយគ្នានេះដែរ លោក សុខ អាន ក៏បានថ្លែងអំណរគុណចំពោះអង្គការលំនៅឋានមនុស្សជាតិដែលបានសាងសង់ផ្ទះចំនួន 600ខ្នងដល់ប្រជាជនកម្ពុជា និងកំពុងតែធ្វើការសាងសង់បន្ថែមចំនួន 6000 ខ្នងទៀតនៅឆ្នាំខាងមុខ ។

បើតាមមន្ត្រីនៃអង្គការលំនៅឋានសម្រាប់មនុស្សជាតិបានឱ្យដឹងថា តាមសំណើរបស់អតីតប្រធានាធិបតីមិនអនុញ្ញាតឱ្យធ្វើបទសម្ភាសន៍នោះទេ ប៉ុន្តែកាលពីសប្តាហ៍មុនក្រុមមនុស្សទាំងខ្មែរ និងបរទេសចំនួន250នាក់ បានរៀបចំធ្វើផ្ទះដែលជាអំណោយរបស់លោក ជីមី ខាធី នេះ ។ ចំណែកក្រុមផ្សេងទៀតបានសង់ផ្ទះចំនួន 166 ខ្នងនៅប្រទេសយួន និងឡាវ ហើយនៅឆ្នាំ2011 និងមានការសង់ផ្ទះរាប់ម៉ឺនខ្នងនៅតាមតំបន់ទន្លេមេគង្គ ។

លោក យិន ផេង អាយុ38ឆ្នាំ ដែលបានទទួល

**តទៅទំព័រទី ១៦**


**Ontime staffing**

**HireSatisfaction™**

# បុគ្គលិកទាន់ពេល ជ្រើសរើសយ៉ាងពេញចិត្ត

POSITION AVAILABLE

នៅមានកន្លែងធ្វើការទំនេរ

PACKING
ការងារវេចខ្ចប់

WAREHOUSE
ការងារក្នុងឃ្លាំង

MANUFACTURING
ការងារផលិត

MACHINE OPERATORS
ការងារបញ្ជាម៉ាស៊ីន

ASSEMBLY
ការងារផ្គុំគ្រឿង

GENERAL LABOR
ការងារពលកម្មទូទៅ

COME IN AND APPLY TODAY

**សូមអញ្ជើញមកដាក់ពាក្យសុំធ្វើការថ្ងៃនេះ**

"Missa Bay" ជាក្រុមហ៊ុននាំមុខគេខាងម្ហូបអាហារ និងបន្លែស្រស់ នៅ ស.រ.អា ឥឡូវនេះ កំពុងរកអ្នកធ្វើការ៤០នាក់ ដើម្បីរៀបចំម្ហូប មិនចាំបាច់មានបទពិសោធន៍ ឬចំណេះខាងភាសាអង់គ្លេស ធ្វើការក្នុងបរិយាកាសសីតុណ្ហភាព ៤០°F ស្អាត ។ កំរៃផ្តើមពី ៨.៥ដុល្លារ ក្នុង១ម៉ោង កំរៃធ្វើលើសម៉ោង ១២.៧៥ ដុល្លារ ក្នុងមួយម៉ោង ធ្វើការលើស ៤០ ម៉ោង ក្នុងមួយអាទិត្យ ក្រុមហ៊ុនមានរថយន្តដឹកជញ្ជូនទៅកន្លែងធ្វើការ

**យើងទទួលពាក្យសុំធ្វើការនៅពីកន្លែងហើយគឺ :**

CHINATOWN: 207 N. 9TH STREET. PHILADELPHIA, PA 19107
TEL: 215-829-0188 (MON-FRIDAY)
9:00-5:00 P.M.
215-880-2724 (Sat & Sunday)
SOUTH PHILLY: 529 WASHINGTON AVE., PHILADELPHIA, PA

**សូមសួររក : ចាន់ សុម៉ាលី**

TEL: 267-608-0742 / 215-462-3508 (MON-FRIDAY)
267-238 2388 (Sat& Sunday)
OnTime Staffing, LLC

ឌឹ ខេមបូឌា ដេលី

The Cambodia Daily

ជំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទបានអនុញ្ញាតិឱ្យធ្វើការចុះផ្សាយដោយ ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី៤ ខែធ្នូ ឆ្នាំ២០១០

# More KR Trials May Cause Civil War, PM Warns

BY EANG MENGLENG AND BETHANY LINDSAY THE CAMBODIA DAILY

...In a speech yesterday, Prime Minister Hun Sen retuned to a warning that further prosecutions at the Khmer Rouge tribunal could result in civil war, apparently backing away from recent reassurances of peace.

Speaking at the National Institute of Education in Phnom Penh, the prime minister denied allegations of political interference in the UN- backed court, but said that further trials and call for testimony by senior government leaders could spark a return to violence for Cambodia.

"The court did not end the war, but be careful because the court could make war again or it might break our society again," the premier said.

Mere days after making a similar prediction of bloody civil war in September, the premier sought to calm the public.

"I appeal to everybody to by quiet. There is nothing that could happen," Mr Hun Sen said during that speech.

However, he claimed yesterday that former Khmer Rouge military leader, assimilated into the government forces in the 1990s with promises of immunity from prosecution, might be provoked by news that international co-prosecution at the tribunal had requested the investigation of five more people .

"Some bad people threatened that there might be more arrests, so [the former Khmer Rouge] are afraid of this issue," Mr Hun Sen said.

"If there 100,000 or 200,000 dead because of the war, or if war happens again, who is going to call the Khmer Rouge back from the jungle? When I went into the jungle to call them out, I was nearly 50 years old, but now I am nearly 60."

He also cautioned the court about summonses testimony issued in October to six senior government leaders from his ruling party; Senate and CPP President Chea Sim, National Assembly Prisedent Heng Somrin, Minister of Foreign Affairs Hor Namhong, Minister of Finance Keat Chhon, and CPP senators Ouk Bunchhoeun and Sim Ka.

"I saw that they want others to testify, but they should be careful because this is a life-and-death issue," Mr Hun Sen said of the Khmer Rouge tribunal summonses.

The premier then waved off allegations that he was interfering with preceding of the court.

"I did not interfere in the court," he said." I am the first one that should at the Paris negotiations that the reasonable place for the Khmer Rouge was in trial, and now when the court tries them, they say that I've interfered in the court, even though I initiated the Khmer Rouge trial in 1979s," Mr Hun Sen added, referring to the four-day military trial in absentia of Pol Pot and Ieng Sary following the Vietnamese incursion into Cambodia that year.

Lars Olsen, UN Spokesman at the Tribunal, said yesterday by telephone that the prime minister's speech would not affect the work of the court.

"The ECCC will continue to make its decisions independently, in accordance with law and international standards of justice. We do not sack advice or approval from prime minister or anyone else," Mr Olsen said.

He added that the court has not yet received any response to the recent summonses to the CPP officials and that the co-prosecutor's requesters for further investigation of Khmer Rouge regime suspects were still pending with the Co- Investigating judges.

The Khmer Rouge tribunal was a frequent point of discussion in Geneva this week during Cambodia's appearance before the Un Human Rights Council for its first mandated Universal Periodic Review.

Several countries addressed accusations of corruption and political interference at the court.

Robert-Jan Sieben of the Netherlands pointed to "persistent allegations of corruption and political interference in Extraordinary Chambers in the Courts of Cambodia." and asked for Cambodia to allow a visit from the UN´s Special Rapporteur on the on the Independence on and Lawyers.

Cambodia's representatives at the review in Ganera did not directly address suspicions of corruption and interference during Tuesday's session. Instead, Cambodia's Permanent Representative to the UN, Sun Suon, chose to portray the tribunal as a beacon of modern justice for Cambodia.

"It is hoped that the ECCC will become a model court... to the enhance rule of law in Cambodia." Mr Soun told the review.

# នាយករដ្ឋមន្ត្រី:សវនាការបន្ថែមទៀតលើខ្មែរក្រហម អាចនឹងបង្កឱ្យមានសង្គ្រាមស៊ីវិល

ដោយ : អ៊ាង ម៉េងឡេង និង BETHANY LINSAY

THE CAMBODIA DAILY

...នៅក្នុងសន្ទរកថាកាលពីម្សិលមិញ លោក នាយករដ្ឋមន្ត្រី ហ៊ុន សែន បានងាកទៅរកការប្រមាណថា ការកាត់ទោសបន្ថែមទៀតនៅសាលាក្តីខ្មែរក្រហម អាចធ្វើឱ្យមានសង្គ្រាមស៊ីវិល ដោយទំនងជាងារចេញពីការធានារបស់លោក អំពីសន្តិភាពកាលពីពេលថ្មីៗនេះ ។


លោក ជា ស៊ីម


លោក ហេង សំរិន


លោក ហោ ណាំហុង

ថ្លែងនៅវិទ្យាស្ថានអប់រំ នៅក្នុងក្រុងភ្នំពេញ លោកនាយករដ្ឋមន្ត្រី បានបដិសេធការចោទប្រកាន់អំពីការជ្រៀតជ្រែកផ្នែកនយោបាយនៅក្នុងសាលាក្តី ដែលគាំទ្រដោយអង្គការសហប្រជា-ជាតិនេះ ក៏ប៉ុន្តែបានមានប្រសាសន៍ថា សវនាការ និងការអំពាវនាវឱ្យមានការផ្តល់ចម្លើយបន្ថែមទៀត ពីក្រុមអ្នកដឹកនាំជាន់ខ្ពស់របស់រដ្ឋាភិបាល អាចបង្កឱ្យអំពើហិង្សាវិលត្រឡប់មកកម្ពុជាវិញបាន ។

លោកនាយករដ្ឋមន្ត្រី បានមានប្រសាសន៍ថា "សាលាក្តីមិនបញ្ចប់សង្គ្រាមទេ ប៉ុន្តែចូលប្រយ័ត្ន ព្រោះសាលាក្តីនេះអាចបង្កឱ្យមានសង្គ្រាម ឬអាចធ្វើឱ្យសង្គមយើងបែកបាក់ម្តងទៀត" ។

គ្រាន់តែប៉ុន្មានថ្ងៃក្រោយកាយទស្សន៍ទាយស្រដៀងគ្នាមួយអំពីសង្គ្រាមស៊ីវិលបង្ហូរឈាម កាលពីខែកញ្ញា លោនាយករដ្ឋមន្ត្រីបានស្វះស្វែងធ្វើឱ្យសាធារណជនស្ងប់ចិត្ត" ។

លោក ហ៊ុន សែន បានមានប្រសាសន៍នៅក្នុងអំឡុងធ្វើសន្ទរកថានោះថា "ខ្ញុំសូមអំពាវនាវដល់អ្នកទាំងអស់គ្នាឱ្យមានភាពស្ងប់ស្ងៀម ។ គ្មានអ្វីដែលអាចកើតឡើងនោះទេ" ។

ទោះជាយ៉ាងណា កាលពីម្សិលមិញ លោកបានអះអាងថា អតីតមេដឹកនាំយោធាខ្មែរក្រហម ដែលបានធ្វើសមាហរណកម្មចុះចូលជាមួយកងកម្លាំងរដ្ឋាភិបាលកាលពីទសវត្សរ៍ឆ្នាំ ១៩៩០ ជាមួយនឹងការសន្យាអំពីនិទណ្ឌភាពពីការកាត់ទោស អាចនឹងមានព័តិមានដោយប្រតិកម្មដោយព័តិមាន ដែលថាក្រុមសហព្រះរាជអាជ្ញាអន្តរជាតិ នៅសាលាក្តីនេះ បានស្នើឱ្យមានការស៊ើបអង្កេតលើមនុស្ស៥នាក់ទៀត ។

លោក ហ៊ុន សែន បានមានប្រសាសន៍ថា "មនុស្សអាក្រក់មួយចំនួនបានគំរាមថា អាចនឹងមានការចាប់ខ្លួនបន្ថែមទៀត ដូច្នេះអតីត [ ខ្មែរក្រហម ] មានការភ័យខ្លាចអំពីបញ្ហានេះ" ។

"ប្រសិនបើមានមនុស្ស ១០០ពាន់នាក់ ឬ ២០០ពាន់នាក់ស្លាប់ដោយសារសង្គ្រាមនោះ ឬ ប្រសិនបើសង្គ្រាមកើតឡើងម្តងទៀត តើនរណាជាអ្នកហៅខ្មែរក្រហមចេញពីព្រៃវិញ? នៅពេលដែលខ្ញុំចូលទៅក្នុងព្រៃ ដើម្បីហៅពួកគេឱ្យចេញពីព្រោះនោះ ខ្ញុំមានអាយុជិត ៥០ ឆ្នាំ ប៉ុន្តែឥឡូវនេះ ខ្ញុំមានអាយុ៦០ឆ្នាំហើយ" ។

លោកក៏បានប្រមាណតុលាការផងដែរ ចំពោះដីកាកោះហៅឱ្យចូលខ្លួនផ្តល់ចម្លើយ ដែលត្រូវបានចេញកាលពីខែតុលា ដល់មន្ត្រីដឹកនាំជាន់ខ្ពស់របស់រដ្ឋាភិបាល ចំនួន៦រូប នៅគណបក្សកំពុងកាន់អំណាចរបស់លោក ដែលមានលោក ជា ស៊ីម ប្រធានព្រឹទ្ធសភា និងជាប្រធានគណបក្សប្រជាជនកម្ពុជា. លោក ហេង សំរិន ប្រធានសភា. លោក ហោ ណាំហុង រដ្ឋមន្ត្រី ក្រសួងការបរទេស. លោក គាត ឈន់ រដ្ឋមន្ត្រី ក្រសួងហិរញ្ញវត្ថុ. លោក អ៊ុក ប៊ុនឈឿន និង លោក ស៊ឹម កា សមាជិកព្រឹទ្ធសភាគណបក្ស ប្រជាជនកម្ពុជា ។

លោក ហ៊ុន សែន បានមានប្រសាសន៍អំពី ដីកាកោះឱ្យចូលខ្លួនរបស់សាលាក្តីខ្មែរក្រហមនោះថា "ខ្ញុំបានឃើញថា ពួកគេចង់ឱ្យអ្នកដទៃផ្តល់ចម្លើយ ប៉ុន្តែពួកគេគួរតែប្រយ័ត្នប្រយែង ព្រោះនេះជាបញ្ហាស្លាប់រស់" ។

ក្រោយមកលោកនាយករដ្ឋមន្ត្រី បានច្រានចោលការចោទប្រកាន់ដែលថា លោកកំពុងជ្រៀតជ្រែកនៅក្នុងដំណើរការកាត់ទោសរបស់សាលាក្តីខ្មែរក្រហម ។

លោកបានមានប្រសាសន៍ថា "ខ្ញុំមិនបានជ្រៀតជ្រែកនៅក្នុងសាលាក្តីនោះទេ" ។ ដោយសំដៅដល់សាលាក្តីយោធាកំបាំងមុខរយៈពេល៤ថ្ងៃលើ ប៉ុល ពត និង អៀង សារី ក្រោយពីការបានលុកលុយរបស់វៀតណាម ចូលមកក្នុងប្រទេសកម្ពុជា កាលពីឆ្នាំ ១៩៧៩ លោក ហ៊ុន សែន បានថ្លែងបន្ថែមថា "ខ្ញុំគឺជាមនុស្សដំបូងគេ ដែលបានស្រែកនៅឯកិច្ចករចានាទីក្រុងប៉ារីស ថាទីកន្លែងសមរម្យសម្រាប់ខ្មែរក្រហម គឺស្ថិតនៅក្នុងសវនាការ ហើយឥឡូវនេះ នៅពេលដែលសាលាក្តីខ្មែរក្រហមកាត់ទោសខ្មែរក្រហម ពួកគេនិយាយថា ខ្ញុំជ្រៀតជ្រែកនៅក្នុងសាលាក្តីខ្មែរក្រហមទៅវិញ បើទោះបីជាខ្ញុំផ្តួចផ្តើមឱ្យមានការបង្កើតឱ្យមានសវនាការលើខ្មែរក្រហម កាលពីឆ្នាំ១៩៧៩ ក៏ដោយ" ។

លោក ឡាស អូលសេន អ្នកនាំពាក្យរបស់អង្គការសហប្រជាជាតិនៅសាលាក្តីខ្មែរក្រហម បានមានប្រសាសន៍តាមទូរស័ព្ទកាលពីម្សិលមិញថា ពាក្យសំដីរបស់លោកនាយករដ្ឋមន្ត្រី នឹងមិនប៉ះពាល់ដល់កិច្ចការសាលាក្តីទេ ។

លោក អូលសេន បានមានប្រសាសន៍ថា "អង្គជំនុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា នឹងបន្តធ្វើសេចក្តីសម្រេចរបស់ខ្លួនដោយឯករាជ្យ ដោយអនុលោមតាមច្បាប់ និងបទដ្ឋានយុត្តិធម៌អន្តរជាតិ ។

តទៅទំព័រទី ១៧

# A.B.C MONEY TRANSACTION, INC

# ក្រុមហ៊ុនផ្ញើប្រាក់ A.B.C



## តម្លៃសំរាប់ផ្ញើទៅស្រុកខ្មែរ

| | | ភ្នំពេញ | តាមខេត្ត |
|---|---|---|---|
| ផ្ញើ $100 | យកកំរ្រៃ | $4.50 | $5.50 |
| $200 | យកកំរ្រៃ | $9.00 | $11.00 |
| $300 | យកកំរ្រៃ | $13.50 | $16.50 |
| $500 | យកកំរ្រៃ | $16.00 | $17.00 |
| $1000 | យកកំរ្រៃ | $25.00 | $26.00 |
| $1500 | យកកំរ្រៃ | $35.00 | $36.00 |
| $2000 | យកកំរ្រៃ | $42.00 | $43.00 |
| $2200 | យកកំរ្រៃ | $46.00 | $47.00 |

សូមកុំភ្លេចទាក់ទងការិយាល័យក្រុមហ៊ុន ABC ដែលនៅជិតលោកអ្នក ប្រសិនបើមានបំណងចង់ផ្ញើប្រាក់ទៅស្រុកខ្មែរ ឬក៏ទូរស័ព្ទមកយើងតាម

### នៅរដ្ឋ VIRGINIA សូមទាក់ទង

**ABC MONEY TRANSATION ,INC.**

**8 locations to serve you in Virginia**

- 6757 Willson Blvd.-Ste.#25 Tel : 703.534.2600
- 4291 Holland Rd-Ste.#111 Tel : 757.474.9400
- 10428 Ridgefield Pkwy Tel : 804-740-2454
- 2519 W . Mercury Blvd . Tel : 757.265.6305
- 23520 Overland Dr. Tel : 703.661.6666
- 6314 Rigsby Rd. Tel : 804.288.2988
- 7252 Arlingston Blvd . Tel : 703.641.0778
- 6217 W. Broad St. Tel : 804.288.6988

**ARIZONA**

◆4215 N 19th Ave. . Tel : 602.266.6744

**GEOERGIA**

◆ 4897 Buford Hwy. Ste. 202. Tel: 770.457.7888

**ILLINOIS**

◆4871 N. Broadway . Tel :773.989.7332

**MASSACHUSETTE**

◆ 996 Dorchester Ave. Tel:617.825.9380

◆ 1365-1377 Dorchester Ave. -Ste.4,Froor 1 .Tel : 617.265.4600

**MINNESOTA**

◆ 2718 Nicollet Ave . S.- Ste. 102 B

◆ Tel : 612.871.4731

◆ 6350 Brooklyn Blvd . Tel : 763.503.3947

**NORTH CAROLINA**

◆ 3000 Central Ave. Ste . #9 . Tel : 704-532-4420

**OREGON**

◆6908 N.E. Sandy Blvd . Tel : 503.281.8088

**PHILADFELPHIA**

◆5520 . Whitaker Ave. -Unit 2 . Tel : 215.831.9794

◆571 Adams Ave . Ave.#4 . Tel : 215.342.6623

**TEXAS**

◆1818 E . Pioneer Pkwy. Ste.156 . Tel : 317.461.1461

◆2615 W . Pioneer Pkwy. Ste.136 . Tel : 214.788.2817

◆5302 E . Belknap St.- Ste.D6 . Tel : 817.831.4836

◆3538 W . Walnut St. Tel : 972.272.2253

◆11205 Bellaire Blvd . Tel : 281.561.6600

◆10909 Scarsdale Blvd . Tel : 281.481.2700

◆13480 Veterans Memorial Dr.-Ste. F2. Tel: 281.587.0807

**WASHINTON STATE**

◆766 S.38th St,. Tel : 253.475.2847

◆3818 S.Graham St.-Ste. C Tel : 206.721.2070

## ក្រុមហ៊ុនទទួលផ្ញើប្រាក់ទៅកម្ពុជា

ABC ជាក្រុមហ៊ុនផ្ញើប្រាក់តែមួយគត់នៅស្រុកខ្មែរ ដែលមានការប្រគល់ប្រាក់ដល់ផ្ទះ

- ស្របច្បាប់
- រហ័សទាន់ចិត្ត
- ធានារ៉ាប់រង និងជូនប្រាក់ទៅដល់ផ្ទះ
- កំរៃផ្ញើថោកជាងកន្លែងដទៃ

### ក្រៅពីការផ្ញើប្រាក់ក្រុមហ៊ុនមានលក់

PHONE CARD និង PINLESS សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ដែលផលិតដោយក្រុមហ៊ុន ABC ផ្ទាល់ មានគុណភាពល្អ ហើយជាពិសេស CARD របស់យើងនឹងទុកបានរហូត មិនអស់កំណត់កាលឡើយ ( NEVER EXPIRED) ។

ត្រូវការអ្នកសហការ (AGENTS ) ជាមួយយើងទូទាំងសហរដ្ឋអាមេរិក និងបានទទួលប្រាក់ចំណូលយ៉ាងខ្ពស់ !

ព័តិមានបន្ថែមសូមទាក់ទង CHET THACTHER តាមទូរស័ព្ទ និងអាស័យដ្ឋានខាងក្រោម :

Office : 714-590-8740 Fax : 714-590-8776
Cell: 714-603-3509 Toll Free : 1-877-939-0110

ABC MONEY TRANSATION, INC
12019 Garden Grove Blvd., Ste.#204
Garden Grove , CA 92843
chesterthatcher@yahoo.com

# ហាងបារាំង ម្ហូបខ្មែរ "ដានីកាហ្វេ"



**ដោយ : ពិន សំខុន**

•••ខ្មែរប៉ុស្តិ៍បានប្រទះហាងម្ហូបខ្មែរចម្លែកមួយទៀត តូចច្រឡឹង នៅលើជ្រុងផ្លូវ "ស្នេឌឺរ" និង ១៧ ខាងត្បូង ហ្វីឡាដែលហ្វៀ ឈ្មោះ "ដានីកាហ្វេ" ជាហាងទើបបើកថ្មី តែបានបង្ហាញសម្ផស្ស និងមោទនភាពថ្មីដល់ខ្មែរ ដែលរស់នៅហ្វីឡាដែលហ្វៀនេះ ។

ហាង "ដានីកាហ្វេ"នោះ ជាភោជនីយដ្ឋានកំរិតតូចដូចភោជនីយដ្ឋានទូទៅនៅ ហ្វីឡា នេះមែន តែការតាំងលំអហាងមានលក្ខណៈគួរឱ្យចង់ចូលទៅមើល ដោយការតុបតែងរបៀបជំនាន់ "ឥណ្ឌូចិន ក្នុងអាណានិគមបារាំង" ដែលជនជាតិឥណ្ឌូចិន ជាពិសេស ខ្មែរជំនាន់ចាស់ តែងឃើញនាអតីតកាល នៅហាងបារាំង គេតែងចូលទៅផឹកកាហ្វេលាយស្រាកូញាក់ ឬកាល់វ៉ាមួយដូស បរិភោគនំប៉័ងប៉ាតេមួយចាន ដើម្បីជួបជុំមិត្តភ័ក្រ្តជជែកគ្នាលេង ពេលព្រឹកមុនចេញទៅធ្វើការ ។

ដានី ម្ចាស់ហាងប្រុស រូបស្អាត សង្ហា រួសរាយរាក់ទាក់ ជាសិល្បករ ជំនាញថតរូប តែនាឱកាសសេដ្ឋកិច្ចអន់ថយពីរឆ្នាំចុងក្រោយនេះ ក៏ប្តូរមុខរបរដោយចាប់យកវិស័យភោជនីយដ្ឋានវិញ ដោយនិយាយថា "ថតរូបគេអាចជៀសវាងបានពេលខ្វះលុយ តែម្ហូបអាហារ ទោះជាគ្មានលុយក៏ត្រូវតែពិសារ ហើយបើភ្ញៀវគេពេញចិត្តគេទៅហើយមកវិញទៀត លោកឯកអគ្គរដ្ឋទូតខ្មែរ ហែម ហេង បានអញ្ជើញមក ពិសារនៅហាងខ្ញុំពីរដងហើយ..." ។ ដានី ហ៊ានចាប់យកមុខរបរថ្មីនេះ ក៏ដោយសារធ្លាប់ធ្វើចុងភៅឱ្យហាងចិន ជាមួយភរិយាខ្លួន ចំនួនប្រមាណជាង១០ ឆ្នាំដែរ ។

រីឯ លីន ជាភរិយា មានរូបស្អាតដូចតួឯកកុន តែមិនសូវនិយាយច្រើនដូចប្តីទេ នាងជាសិល្បការិនីម្នាក់ទៀតដែរ មានជំនាញខាងកែសម្ផស្សស្ត្រី ។ នាងចូលចិត្តបរិយាកាសដែលមានអនាម័យខ្ពស់ ការតុបតែងប្រណីត ដែលបានលើកទឹកចិត្តប្តីឱ្យប្តូរហាងកែរសម្ផស្សស្ត្រី ដ៏គួរឱ្យចាប់អារម្មណ៍របស់ខ្លួន ទៅជាភោជនីយដ្ឋានខ្នាតតូច កែរសម្ផស្ស និងអនាម័យមួយវិញបាន ។ នាងបានជ្រើសយកមុខម្ហូបបីបួនមុខ ដែលសាធារណជនចូលចិត្តពិសារម្ហូបខ្មែរ តែងសួររកមកជាគុណ សម្បត្តិរបស់ហាងថ្មីថ្មោងរបស់នាង គឺ ការីសារម៉ាន, ខគោ, មីបំពង (ឬមីសៀម) ទឹកកិន ផ្លែឈើ, ប៉ាតេនំប៉័ងដាក់ប៊ឺរ ក្តៅស្រួយ បំរើជារបៀបបារាំង ធ្វើឱ្យមន្ត្រីចាស់ៗ នឹកទៅដល់ហាងបារាំង នៅម្តុំវត្តភ្នំ ចុងផ្លូវ "ឌូដាដឺឡាគ្រេ" (ឥឡូវហៅផ្លូវ នរោត្តម) ជាមិនខាន ។




ហាងរបៀបបារាំង ម្ចាស់ខ្មែរ បំរើខ្មែរ ស្ថិតនៅកណ្តាលតំបន់ដែលសម្បូរខ្មែររស់នៅមួយផ្នែកទៀត គឺខាងលិច និងខាងត្បូងក្រុងហ្វីឡា ។ តំបន់នេះ គេមិនសូវលើកតម្កើង ដោយមានក្រុមពាណិជ្ជកម្មតិចតួចនៅទីនោះ ហើយក៏ពុំមានចារីកជាអ្នកផ្សព្វផ្សាយ "ប៊ីស៊ីណេស" របស់ខ្លួនទៀតផង ។ ដានី និង លីន បានរួមគុណសម្បត្តិថ្មីទៀតរបស់ខ្លួន នៅក្នុងតំបន់ដែលខ្លួនរស់នៅថា "ខ្មែរចូលចិត្តស្អាត, ឆ្ងាញ់, សម្ផស្សល្អ, ស្លូតត្រង់ដូចបារាំង-អាមេរិកាំងដែរ... ពុំមែនចេះតែអាវ៉ាសែ កាប់ចាក់ដូចគេនិយាយពីសម័យ ប៉ុល ពត នោះទេ ..." ។ ដានី និង លីន បានរំលឹកឈ្មោះភ្ញៀវខ្មែរ ជាមនុស្សចាស់ស្រុកក្នុងតំបន់ដែលបានត្រឡប់មករក "ដានីកាហ្វេ" ច្រើនផង មាន សារុំ, សានី, ផល្លា, ឆាយ... តែខ្មែរប៉ុស្តិ៍ និងសមាគមខ្មែរ ក៏ធ្លាប់បានបញ្ជាទិញ ការីសារម៉ាន និង មីបំពង សម្រាប់ភ្ញៀវជាង ១០០នាក់ របស់អង្គប្រជុំខ្លួនដែរ... ដោយសារតែកេរ្តិ៍ឈ្មោះ ស្នាដៃពូល្បីយ៉ាងឆាប់រហ័ស តែពីខែប៉ុណ្ណោះ បន្ទាប់ពីហាងនេះ បានធ្វើការបើកទ្វារទទួលភ្ញៀវ ៕





## Danny's Café

### Foods & Hoagies

1. Beef Stew Serve with Bread..........................................នំប៉័ងខគោ
2. Curry Chicken Serve with Bread.......................................នំប៉័ងការីសាច់មាន់
3. Curry Beef Saramann Serve with Bread...........................នំប៉័ងសាច់គោ ខការីសារាមាន់
4. Meatball Soup Serve with Bread ......................................ស៊ុបប្រហិតជាមួយនំប៉័ង
5. Mi Siam ................................................................................មីសៀម














1730 Snyder Ave, Philadelphia, PA 19145 / Mon – Fri: 7am – 7pm Saturday: 9 am – 8 pm / Sunday : CLOSED
Tel: 215.467.4082 Fax: 215.467.4642 / Thank You, Please come again !

# SHEN YUN

THE SHOW THAT'S LEAVING MILLIONS IN AWE.

神韻晚會




ALL-NEW 2010 PROGRAM

WITH LIVE ORCHESTRA

## JAN 2-3

ACADEMY OF MUSIC

240 South Broad Street, Philadelphia

បណ្តែតខ្លួនលោកអ្នក ជាមួយនឹងបទពិសោធន៍សិល្បៈ
ដែលពុំអាចប្រដូចបាន របាំ ភ្លេង ក្លាសិុកចិន និងអ្វីៗជាច្រើនទៀត
នឹងនាំឱ្យឃើញជីវិតពិតនៅក្នុងឆាកសិល្បៈដ៏រំភើបមួយ ។

TICKETS:

(215) 893-1999 (Box Office)
(215) 475-4492 (Hotline/中文熱線)
www.AcademyofMusic.org

**ShenYunPerformingArts.org**




Funded in part by the National Endowment for the Arts

Presented by Greater Philadelphia Asian Culture Center and Greater Philadelphia Falun Dafa Association

ឌឹ ខេមបូឌា ដេលី
The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទបានអនុញ្ញាតិឱ្យធ្វើការចុះផ្សាយដោយ ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី៤ ខែធ្នូ ឆ្នាំ២០១០

# Gov´t To Grant Fishing Licenses to Thai Boats

By Bhann Ana
THE CAMBODIA DAILY

•••Authorities the military, several ministries Koh Kong province formed a new committee yesterday to regulate Thai Fishing boats entering Cambodian waters, Deputy Prime Minister and Defense Minister Tea Banh said.

Thai trawlers wishing to fish in Cambodian waters are required to apply for a new business license from the committee and respect Cambodia's maritime borderline, Mr Bach said. The size of the boat and the power of its engine must also be registered.

Mr Bach, who led the meeting, said the government decided to grant to concession because Cambodian fishermen do not have large commercial trawlers to fish their own waters, "It is a common issue relating to the regulation and the restriction of Thai fishing boats," the minister said yesterday. "They can fish only in [the] allowed area and must respect our prohibited area."


លោក ទៀ បាញ់

The Committee is chaired by newly appointed Koh Kong Provincial Governor Bun Loeut and consists of members from the Royal Cambodian Navy, Military Police,Marine Border Police,

( Continued on page 14 )

# រដ្ឋាភិបាលនឹងផ្តល់អាជ្ញាប័ណ្ណនេសាទ នៅក្នុងដែនទឹកកម្ពុជាដល់ទូកនេសាទថៃ

ដោយ : ផាន់ អាណា
THE CAMBODIA DAILY

•••លោក ទៀ បាញ់ ឧបនាយករដ្ឋមន្ត្រី និងជារដ្ឋមន្ត្រីក្រសួងការពារជាតិ បានមានប្រសាសន៍ថា ក្រុមអាជ្ញាធរមកពីផ្នែកយោធាក្រសួងជាច្រើន និងខេត្តកោះកុង បានបង្កើតគណៈកម្មាធិការថ្មីមួយ កាលពីម្សិលមិញ ដើម្បីត្រួតពិនិត្យមើលទូកនេសាទថៃ ដែលចូលនេសាទក្នុងដែនទឹកកម្ពុជា ។

លោក ទៀ បាញ់ បានមានប្រសាសន៍ថា ទូកនេសាទរបស់ថៃ ដែលចង់ចូលនេសាទក្នុងដែនទឹកកម្ពុជា តម្រូវដោយដាក់ពាក្យសុំអាជ្ញាប័ណ្ណរកស៊ីពីគណៈកម្មាធិការនេះ ហើយត្រូវគោរពព្រំដែនទឹកកម្ពុជា ។ ទំហំទូក និងកម្លាំងម៉ាស៊ីនទូក ត្រូវតែចុះបញ្ជីផងដែរ ។

លោក ទៀ បាញ់ ដែលបានដឹកនាំកិច្ចប្រជុំនេះ បានមានប្រសាសន៍ថា រដ្ឋាភិបាលបានសម្រេចផ្តល់សម្បទាន ពីព្រោះអ្នកនេសាទកម្ពុជា គ្មានទូកនេសាទពាណិជ្ជកម្មធំៗ ដើម្បីនេសាទពាក្នុងដែនទឹករបស់ខ្លួន ។

លោករដ្ឋមន្ត្រី បានមានប្រសាសន៍ថាកាលពីម្សិលមិញថា "វាជារឿងធម្មតាពាក់ព័ន្ធនឹងបទបញ្ញត្តិ និងការរឹតបន្តឹងទូកនេសាទថៃ ។ ពួកគេត្រូវរាយការណ៍អំពីឧបករណ៍នេសាទដែលពួកគេចង់ប្រើប្រាស់ ។ ពួកគេអាចត្រឹមតែនេសាទនៅក្នុងតំបន់ដែលត្រូវបានអនុញ្ញាត ហើយត្រូវតែគោរពតំបន់ហាមឃាត់របស់យើង" ។

លោក ពុំស៊ីថា អធិការកិច្ចនៅរដ្ឋបាលជលផលសមុទ្រ ដែលក៏ជាសមាជិកម្នាក់នៅក្នុងគណៈកម្មាធិការនេះដែរនោះ បានមានប្រសាសន៍ថា លោក ប៊ុន លើត អភិបាលខេត្តកោះកុង ដែលទោះត្រូវបានតែងតាំងថ្មី និងធ្វើប្រធានគណៈកម្មាធិការនេះហើយ មានសមាជិកមកពីកងទ័ពជើងទឹកកម្ពុជា កងរាជអាវុធហត្ថប៉ូលីសព្រំដែនទឹក ក្រសួងបរិស្ថាន និងរដ្ឋបាលជលផលនៅក្រសួងកសិកម្ម ។

គេមិនអាចទាក់ទងលោក ប៊ុន លើត ដែលត្រូវជាប្អូនថ្លៃរបស់លោក ទៀ បាញ់ ដើម្បីសុំសេចក្តីអត្ថាធិប្បាយបានទេ ។

ក្រុមមន្ត្រីដែលបានចូលរួមក្នុងកិច្ចប្រជុំនោះ បាននិយាយថា តទៅទំព័រទី ១៤

ការិយាល័យថែទាំសុខភាពគ្រួសារ
5746 Rising Sun Avenue. Philadelphia, Pa 19120
Phone: (215)904-6891 Fax: (215) 745-2290
DR. TRUONG H. NGUYEN, M.S., D.O., P.C
FAMILY MEDICINE – INTERNAL MEDICINE – OSTEOPATHIC MANIPULATIVE THERAPY
វេជ្ជបណ្ឌិតជំនាញខាងព្យាបាលជម្ងឺទឹកនោមផ្អែម_សរសៃបេះដូង_ពិនិត្យសុខភាពស្ត្រី (GYN)
_ពិនិត្យតម្រងនោម_ប្រព័ន្ធរំលាយអាហារ...
* ផ្នែកពិនិត្យសុខភាពជាប្រចាំ និងព្យាបាលជម្ងឺស្បែក....ឈឺក្បាលប្រកាំង, ឈឺសន្លាក់ដៃជើង
បញ្ជាក់សុខភាពសម្រាប់អាពាហ៍ពិពាហ៍, សម្រាប់ធ្វើដំណើរ និង សម្រាប់សាលារៀន
* ជាពិសេស : ទទួលព្យាបាលអ្នកគ្រោះថ្នាក់មានមុខរបួស ឬរអិលដួលនៅកន្លែងធ្វើការ
យើងណែនាំផ្តល់មេធាវីដែលមានបទពិសោធន៍ជាង ២០ ឆ្នាំ និងអ្នកបកប្រែភាសាជំនាញ មានខ្មែរ-ចិន-វៀតណាម
ជូនដោយឥតគិតថ្លៃ បើលោកអ្នកត្រូវការ :
* ធានាថា យើងធ្វើការបានលទ្ធផលឆាប់រហ័ស-លើសពីនេះ យើងរីករាយនឹងជួយដល់ភ្ញៀវណាដែល
មិនចេះនិយាយអង់គ្លេស ហើយចង់កំណត់ពេលទៅមន្ទីរពេទ្យ ឬចង់ប្តូរ
ក្រុមហ៊ុនធានាសុខភាព (Health Insurance)
* យើងទទួល មេឌីកេដ,មេឌីឃែ , និង អ៊ិនស្វូរិន ស្ទើរតែទាំងអស់
និងគិតតម្លៃទាបជូនអ្នកដែលមិនមាន អ៊ិនស្វូរិន ទៀតផង ។
ការិយាល័យបើកទ្វារ :៣
ថ្ងៃ ច័ន្ទ -អង្គារ-ពុធ- និង សុក្រ
ពីម៉ោង ៩ព្រឹកដល់១រសៀល
និងពីម៉ោង ៣ ដល់ ៧ ល្ងាច
បិទទ្វារ : ថ្ងៃ សៅរ៍ និងថ្ងៃអាទិត្យ និងព្រហស្បត្តិ៍

( Continued from page 08 )

# Gov´t To Grant...

Envirment Ministry and fishery Administration at the Agriculture Ministry, said Bum Sitha, inspector of the coastal fishery administration who is also a member of the committee.

Mr Loeut, who is a brother-in-law of Mr Banh, could not be reached for comment.

Officials who attended the meeting said the concession would allow Thai commercial boats to fish in the dreep waters of the overlapping claims areas of the Cambodian-Thai maritime border. However, the exact number of Thai boats and the amount of revenue expected to be generated be the fishing deal are unknown.

"There are a lot of boats," said Mr Banh, who declined to reveal the amount each Thai boat must pay to enter Cambodian waters. Other key details, such as how many licenses would be granted and how long they would be valid for, remained unknown also.

But this may not be the first time that such a deal had existed with Thai fishermen.

The English-language newspaper The Bangkok Post reported on Nov 25 that Koh Kong officials scrapped all existing fishing concession with Thai trawlers after Mr Loeut took over from former Koh Kong Governor Yuth Phouthang on Nov 12.

The move caused Thai authorities to ask Cambodia to establish a new concession project after about 1,000 Thai fishing boats which previously paid 60,000 baths, or about $1,810 per boat, under the old concession, apparently with the former governor-were anchored.

Mr Phouthang could not be reached for comment.

"There is nothing new. It is matter of new leaders reviewing the legal regulation," said Tea Sokha, deputy commander of Royal Cambodian Navy base in Koh Kong province. Mr Sokha also said that he was unsure about the number of boats that will seek the license and amount of money the licenses will generate.

Sam Nouv, deputy director of fishery administration, said Cambodia's Koh Kong province and Thai's Trat province signed and agreement in the 1990s to allow Thai trawlers to fish in Cambodian water by paying tax to the government.

"The fishery administration had a statistic of annual income. There are hundreds of thousands of millions [of] riel in tax," said Mr Nouv, though he was unable to give specific figures for the amount of money the practice in Koh Kong has generated for the country.

"The have paid a lot of tax to te government," he added.

Mr Nouv said the fishery administration only recorded statistics regarding the agreement but does not manage the agreement nor does it know the number of commercial boats that come to fish in Cambodian waters.

(តមកពីទំព័រទី ០៨) **រដ្ឋាភិបាលនឹងផ្ដល់អាជ្ញាប័ណ្ណនេសាទ...**

សម្បទាននឹងអនុញ្ញាតឱ្យទូកនេសាទពាណិជ្ជកម្មថៃ ធ្វើការនេសាទនៅតំបន់ទឹកជ្រៅនៃតំបន់ត្រួតស៊ីគ្នា នៃព្រំដែនទឹកកម្ពុជា និងថៃ ។

ទោះជាយ៉ាងណា គេមិនបានដឹងថា ពីចំនួនទូកនេសាទថៃពិតប្រាកដ និងប្រាក់ចំនួនដែលគេរំពឹងថានឹងទទួលបាន ពីកិច្ចព្រមព្រៀងនេសាទនេះទេ ។ លោក ទៀ បាញ់ ដែលបានបដិសេធមិនបង្ហើបប្រាប់ពីចំនួនទឹកប្រាក់ ដែលទូកនេសាទថៃ នីមួយៗត្រូវបង់ដើម្បីចូលមកនេសាទក្នុងដែនទឹកកម្ពុជានោះបានមានប្រសាសន៍ថា មានទូកនេសាទច្រើនណាស់ ។ ព័ត៌មានលំអិត សំខាន់ៗដទៃទៀតដូចជាថា តើអាជ្ញាប័ណ្ណប៉ុន្មាននឹងត្រូវបានផ្ដល់ជូន ហើយអាជ្ញាប័ណ្ណទាំងនោះ មានសុពលភាពយូរប៉ុណ្ណានោះក៏គេមិនទាន់ដឹងនៅឡើយដែរ ។

ប៉ុន្តែនេះប្រហែលជាមិនមែនជាលើកទី១ ទេ ដែលកិច្ចព្រមព្រៀងបែបនេះ ត្រូវបានធ្វើឡើងជាមួយអ្នកនេសាទថៃ ។

កាសែតបាងកកប៉ុស្តិ៍ ជាកាសែតភាសាអង់គ្លេស បានរាយការណ៍កាលពីថ្ងៃទី២៥ ខែវិច្ឆិកា ថាក្រុមមន្ត្រីខេត្តកោះកុង បានលប់ចោលសម្បទាននេសាទ ដែលមានស្រាប់ទាំងអស់ ជាមួយទូកនេសាទថៃ ក្រោយពីលោក ប៊ុន លើត លើកកាន់តំណែងបន្តពីលោក យុទ្ធ ភូថង អតីតអភិបាលខេត្តកោះកុង កាលពីថ្ងៃទី ១២ ខែវិច្ឆិកា ។

ចំណាត់ការនេះ បានធ្វើឱ្យក្រុមអាជ្ញាធរថៃ ស្នើឱ្យប្រទេសកម្ពុជា បង្កើតនូវគម្រោងសម្បទានថ្មីមួយ បន្ទាប់ពីទូកនេសាទថៃ ប្រហែល ១.០០០ គ្រឿង ដែលពីមុនបានបង់ប្រាក់ ៦០.០០០ បាត ឬប្រហែល ១.៨១០ដុល្លារ ក្នុងទូកនីមួយៗ ក្រោមសម្បទានចាស់ ដែលទំនងជាធ្វើជាមួយអតីតអភិបាលខេត្តនេះបានបោះយុថ្កានៅមួយកន្លែង ។ គេមិនអាចទាក់ទងលោក យុទ្ធ ភូថង ដើម្បីសុំសេចក្ដីអត្ថាធិប្បាយបានទេ ។

លោក ទៀ សុខា មេបញ្ជាការរងកងទ័ពជើងទឹកកម្ពុជា ដែលមានមូលដ្ឋាននៅខេត្តកោះកុង បានមានប្រសាសន៍ថា "គ្មានអ្វីថ្មីទេ។ វាជារឿងថ្នាក់ដឹកនាំថ្មី ពិនិត្យមើលបទបញ្ញត្តិតាមផ្លូវច្បាប់ " ។

លោក ទៀ សុខា ក៏បានមានប្រសាសន៍ផងដែរថា លោកមិនប្រាកដទេ អំពីចំនួនទូកនេសាទ ដែលនឹងស្វែងរកអាជ្ញាប័ណ្ណ និងចំនួនប្រាក់ដែលទទួលបានពីការចេញអាជ្ញាប័ណ្ណនេះ ។

លោក សម នៅ អនុប្រធានរដ្ឋបាលជលផល បានមានប្រសាសន៍ថា ខេត្តកោះកុងរបស់កម្ពុជា និងខេត្តត្រាតរបស់ថៃ បានចុះហត្ថលេខាលើកិច្ចព្រមព្រៀងមួយ កាលពីទសវត្សរ៍ឆ្នាំ ១៩៩០ ដើម្បីអនុញ្ញាតឱ្យទូកនេសាទថៃ ធ្វើការនេសាទនៅក្នុងដែនទឹកកម្ពុជា ដែលបង់ពន្ធឱ្យរដ្ឋាភិបាល ។

លោក សម នៅ មានប្រសាសន៍ថា "រដ្ឋបាលជលផលមានស្ថិតិនៅចំណូលប្រចាំឆ្នាំ ។ មានទឹកប្រាក់រាប់ពាន់លានរៀល បានមកពីចំណូលពន្ធ" តែទោះជាយ៉ាងណា លោកមិនអាចផ្ដល់តួលេខជាក់លាក់អំពីចំនួនទឹកប្រាក់ ដែលការអនុវត្តន៍ក្នុងខេត្តកោះកុង បានផ្ដល់ដល់ប្រទេសនេះទេ ។ លោកបានបន្ថែមថា ពួកគេបានបង់ពន្ធជាច្រើនឱ្យរដ្ឋាភិបាល" ។

លោក សម នៅ មានប្រសាសន៍បន្ថែមទៀតថា រដ្ឋបាលជលផលគ្រាន់តែកត់ត្រាស្ថិតិពាក់ពន្ធនឹងកិច្ចព្រមព្រៀងតែប៉ុណ្ណោះ ប៉ុន្តែមិនបានចាត់ចែងកិច្ចព្រមព្រៀង ហើយក៏មិនបានដឹងពីចំនួនទូកនេសាទពាណិជ្ជកម្ម ដែលចូលមកធ្វើការនេសាទក្នុងដែលទឹកកម្ពុជាដែរ ៕

NEW PHNOM PENH RESTAURANT

● មីបំពងគ្រឿងសមុទ្រ ● គុយទាវគោគ-គុយទាវសាច់គោ ● ផាត់ថៃ
● ឡុកឡាក់ ● មាន់ឆាខ្ញី
● បាយសាច់ជ្រូកអាំង ● មីកន្ដាំងសាច់គោ ● បាយឆាសាច់គ្រប់មុខ

TEL. (215) 389-2122

2301 South. 7th Street. Philadelphia, Pa 19148
(7th & Wolf)

Leema's 168 Market

5010 Old York Rd, Philadelphia, PA 19141-2707

Contact Phone: (215) 455-1003

ផ្សារ លីម៉ា 168

ទំព័រពាណិជ្ជកម្ម

លោកអ្នកមានជំងឺឫសដូងបាតឬ ?

ឫសដូងបាតក្នុង ? (Internal Pile) ឬឫសដូងបាតក្រៅ ? (External Pile) ជំងឺទាំងពីរនេះ គ្មានបញ្ហាទេ តែកុំទុកឱ្យយឺតពេលវានឹងអាចក្លាយជាជំងឺមហារីកលំបាកព្យាបាលណាស់ ហើយវាអាចបណ្ដាលឱ្យស្លាប់បានទៀតផង ។ បើលោកអ្នកមានរងនូវការចាប់ឈឺផ្សារអួលណែនធ្លាក់ឈាមរាំរ៉ៃនេះជាទុក្ខវេទនាយ៉ាងយូរ ។ សូមលោកអ្នកទាក់ទងនឹងខ្ញុំបាទ **គីម ភៀន** ដែលអ្នកស្រុកក្បៀនស្វាយ បានឱ្យរហ័សនាមថា "**លោកគ្រូពេទ្យទេវតា ឬលោកគ្រូ ទេព្យឥសី** " ដោយសារខ្ញុំជួយអ្នកជម្ងឺទាំងនោះឱ្យជាសះស្បើយពីការចុកចាប់អួលផ្សារយ៉ាងសាកសិទ្ធិបំផុត ។ លោកអ្នកគ្រាន់តែប្រើថ្នាំបុរាណជប៉ុនផលិតតាមបែបសម័យទំនើប នោះអាចបានជាសះស្បើយដូចបំណង ។ ក្នុងពេលព្យាបាលអាចទៅធ្វើការធម្មតាមិនបាច់ឈប់សម្រាកអ្វីឡើយ ។ អាចជួបតាមទូរស័ព្ទពីម៉ោង ៧ ព្រឹក ដល់ម៉ោង ៦ ល្ងាច រាល់ថ្ងៃ សុក្រ សៅរ៍ អាទិត្យ ។ ពីម៉ោង ៣ ល្ងាច រាល់ថ្ងៃ ច័ន្ទ អង្គារ ពុធ ព្រហស្បត្តិ៍ ។ ខ្ញុំបាទជាគ្រូទេព្យទេវតា **គីម ភៀន**

KIM, Phien 421 E Mentor St. Philadelphia. PA 19120
Phone : 215 680 2059




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន** (**តពីលេខមុន**)

**ឆ្នាំ ១៩៧៣**

**១ មករា** : លន់ នល់ មិនព្រមចរចាជាមួយសម្តេច សីហនុ - ការលាលែងពីការងារផ្សាយវិទ្យុកុម្មុយនីស្ត តាំងនៅហាណូយ របស់ កែវ ចិន្ដា, ប៉ែន សុវណ្ណ និងថ្នាក់ដឹកនាំមួយចំនួនទៀត - អ្នកទាំងនោះចង់ចូលរួមជាមួយ ជាសុទ្ធ ដើម្បីចង្កើតគណបក្សថ្មីមួយទៀត តែយួនមិនព្រម ។

**២១-២៦ មករា** : មានការចរចារវាងបក្សកុម្មុយនីស្តខ្មែរ និងបក្សកុម្មុយនីស្តវៀតណាម - អ្នកចុងក្រោយលើកពីកិច្ចព្រមព្រាងនៅប៉ារីស តែបក្សកុម្មុយនីស្តខ្មែរ មិនព្រមផ្តើមត្រឡប់មកចរចាជាមួយវៀតណាម ទេ - វៀតណាម បានបង្អាក់ការបញ្ជូនសព្វាវុធចិន មកចលនារំដោះខ្មែរ ដែលកាត់តាមវៀតណាម ។

**២៧ មករា** : ពិធីចុះហត្ថលេខាលើកិច្ចព្រមព្រាងក្រុងប៉ារីស របស់ភាគីវៀតណាម - ទ័ពវៀតណាមខាងជើងបានត្រូវដកថយម្តងបន្តិចពីកម្ពុជា - កងពល ៣ ក្នុងចំណោមកងពលចំនួន ៤ បានត្រូវត្រឡប់មកវៀតណាមវិញ នាចុងឆ្នាំ ១៩៧២ រីឯកងពលទី៥ នៅប្រចាំការនាព្រំប្រទល់ដែន ប៉ុំខេត្តកំពង់ចាម - នៅតំបន់ខ្លះ ដែលក្រុម ប៉ុល ពត កាន់កាប់ដូចជាតំបន់ ២៥ ក្រោមបញ្ជាការរបស់ តាម៉ុក ការដកទ័ពវៀតណាម តម្រូវឱ្យធ្វើកាន់តែឆាប់រហ័ស ដោយសារសម្ពាធពីអតីតសម្ព័ន្ធមិត្តកុម្មុយនីស្តខ្មែរ ។

**៨ កុម្ភៈ** : ចម្បាំងនៅតាមបណ្តោយទន្លេមេគង្គកាន់តែខ្លាំងក្លា ។

**ពាក់កណ្តាលខែកុម្ភៈ** : សម្តេច សីហនុ មកដល់ក្រុងហាណូយ ធ្វើដំណើរតាមផ្លូវលំហូជីមិញ ហើយផ្តើមទស្សនៈកិច្ចរបស់ព្រះអង្គ នៅតំបន់គ្រប់គ្រងដោយចលនារណសិរ្សរំដោះជាតិកម្ពុជា ។

**១៧ មីនា** : ទម្លាក់គ្រាប់បែកលើវិមានរបស់ប្រធានាធិបតីនៅចំការមន ដោយអតីតអង្គរក្សសម្តេច សីហនុ - លន់ នល់ ឥតរងគ្រោះថ្នាក់ទេ តែមានមនុស្សស្លាប់ ៤៧នាក់ - មានការចាប់ខ្លួនជនសង្ស័យថា ឃុបឃិតជាច្រើននាក់ ព្រមទាំងព្រះញាតិវង្សស្តេចផង ។

**២៣ មីនា** : នៅភ្នំគូលែន ប្រារព្ធខួបឆ្នាំទី៣ នៃរណសិរ្សរំដោះជាតិកម្ពុជា ដោយមានសម្តេច សីហនុ, អ្នកម្នាង មូនីក, ខៀវ សំផន, ហ៊ូ យន់, ហ៊ូ នឹម, សុន សេន និង សាឡុតស ។

**៨ មេសា** : សម្តេច សីហនុ ត្រឡប់មកដល់ហាណូយ ។

**១០ មេសា** : ផ្តើមបញ្ជូនស្បៀងមកភ្នំពេញតាមផ្លូវអាកាស ។ ទ័ពអាកាស B52 បង្កើនការទម្លាក់គ្រាប់បែក ពេលខ្លះឡើងដល់ ៣៦០០ តោន ក្នុងមួយថ្ងៃ ។

**១១ មេសា** : សីហនុ មកដល់ប៉េកាំងវិញ ។

**១៧ មេសា** : រដ្ឋាភិបាល ហង្ស ធន់ហាក់លាលែង ។

**២៣ មេសា** : ប្រជុំសន្និបាតសភាទាំងពីរ ផ្តល់អំណាចពិសេសដល់ លន់ នល់ - ផ្អាកការងារសភាចំនួន ៦ ខែ ។

***២៦ មេសា : ៥. រដ្ឋាភិបាល អ៊ិន តាំ ទី១***

***(១៥.៥.១៩៧៣- ២២.១០.១៩៧៣)***

. នាយករដ្ឋមន្ត្រី : អ៊ិន តាំ

. ទេសរដ្ឋមន្ត្រីអមទីស្តីការប្រធានាធិបតីសាធារណរដ្ឋ : ម៉ៅ សាយ

. ទេសរដ្ឋមន្ត្រីអមនាយករដ្ឋមន្ត្រី : ឆន សុខុម

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកសាធារណការ និងដឹកជញ្ជូន : ឋាប នាងិន

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកអតីតយុទ្ធជន : ស ហោ

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកការបរទេស : ឡុង បូរ៉េត

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកមហាផ្ទៃ និងធម្មការ : ហែម កេតសាណា

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកសាមគ្គីជាតិ : រ៉ាយ លុត

. ទេសរដ្ឋមន្ត្រីទទួលបន្ទុកការពារជាតិ : អ៊ុយ សាយ

. រដ្ឋមន្ត្រីហិរញ្ញវត្ថុ : កែង ម៉ុងត្រី

. រដ្ឋមន្ត្រីផែនការ : ឃី តាំងលីម

. រដ្ឋមន្ត្រីការងារ និងសុខមាលភាពប្រជាជន : តាំ រ៉េត

. រដ្ឋមន្ត្រីព័ត៌មាន : ស៊ុំ ឈុំ

. រដ្ឋមន្ត្រីប្រៃសណីយ៍ និងទូរគមនាគមន៍ : ឈៀង គីមសួ

. រដ្ឋមន្ត្រីវប្បធម៌ : អ៊ុំ សាមុត

. រដ្ឋមន្ត្រីពាណិជ្ជកម្ម និងផ្គត់ផ្គង់ : សាផុន សារ៉ាស៊ី

. រដ្ឋមន្ត្រីអភិវឌ្ឍន៍សហគមន៍ : គង់ អ៊ិន

. រដ្ឋមន្ត្រីយុត្តិធម៌ : លី ហ្វាន់ប៉ាន់

. រដ្ឋមន្ត្រីសាធារណសុខាភិបាល : សុខ ហ៊ាងស៊ុន

. រដ្ឋមន្ត្រីអប់រំជាតិ : កែវ សង់គីម

. រដ្ឋមន្ត្រីសង្គមកិច្ច និងជនភៀសខ្លួន : លឿង ណាល់

. រដ្ឋមន្ត្រីកសិកម្ម : ស៊ីសុវត្ថិ ឌួងជីវិន

. រដ្ឋមន្ត្រីឧស្សាហកម្មរ៉ែ និងកសិកម្ម : ស៊ាន ប៉េងសែ

រដ្ឋមន្ត្រីទេសចរណ៍ : ប៉ា ផេង ។

**២០ ឧសភា** : ផ្តើមនយោបាយសហករ - ផែនការដាក់ដីរួម បង្កើនផលនៅតំបន់ចលនារណសិរ្ស ដែលម្តងបន្តិចៗ នៅក្រោមត្រួតត្រារបស់បក្សកុម្មុយនីស្តខ្មែរ - បង្កើតធម្មនុញ្ញដាច់ណាត់នៃសហករ - លុបបំបាត់កាយចាយលុយ - បន្ថយឥទ្ធិពលចលនាសីហនុនិយម និងពួកខ្មែរកុម្មុយនីស្ត ហាណូយ - មានការប៉ះទង្គិចច្រើនដងជាមួយទ័ពវៀតណាម ដែលនៅក្នុងតំបន់នៅឡើយ ។ ***តទៅលេខក្រោយ***

# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha



❖ រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា

❖ បកប្រែជាភាសាអង់គ្លេស ដោយ ហ្សីត .អេ.លី

❖ ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី

❖បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

❖ Original Illuatration and Naration in Thai by Gunapayuta.

❖ Translation into English by A Lu.

❖ Coloring by Yann Fang Lee

❖ Translation into Khmer by Bhikkhu Kong Am.

**៤៣-** គេបានដឹងថា ព្រះសិទ្ធត្ថខុសប្លែកពីកម្លោះផ្សេងៗទៀត ព្រះអង្គទ្រង់មិនចាប់អារម្មណ៍នឹងសម្រស់លំអរបស់ស្រីក្រមុំទាំងនោះទាល់តែសោះ ។ ព្រះអង្គត្រង់បានប្រទានទូវរង្វាន់ដល់ពួកគេក៏ពិតមែន តែគ្រប់ពេលទាំងអស់ ព្រះទ័យព្រះអង្គហាក់ដូចជាទ្រង់ផ្តោតសំដៅទៅលើអ្វីផ្សេងៗ ដែលសំខាន់ជាងអាការៈញញឹមប្រិមប្រិយស្រស់សង្ហារ និងកាយវិការទន់ល្វន់ល្វៃដ៏គួរឱ្យប្រតិព័ន្ធស្នេហាពេកក្រៃរបស់កញ្ញាស្រីក្រមុំទាំងនោះទៅទៀត ។ ហេតុនេះហើយ បានជានាងកញ្ញាខ្លះនិយយាថា ពេលដែលព្រះអង្គម្ចាស់ទ្រង់ព្រះប្រទានរង្វាន់ដល់ពួកនាង នាងមានអារម្មណ៍ថា ព្រះអង្គទ្រង់មិនមែនជាមនុស្សធម្មតាទេ ប៉ុន្តែព្រះអង្គជាមនុស្សទេពដោយពិត ។

**៤៤-** ក្បួនដំណើរជាជួរៗបន្តបន្ទាប់គ្នានៃបវរកញ្ញាទាំងឡាយជិតនឹងផុតអស់ទៅហើយ រង្វាន់ទៀតសោតទ្រង់បានប្រទានអស់គ្មានសល់ ។ ព្រះអង្គនៅតែគង់យ៉ាងស្ងប់ស្ងៀមដោយទ្រង់នៅតែគិតអ្វីផ្សេងៗដដែល ។ ជនទាំងឡាយគិតថាបេក្ខនារីចុងក្រោយបានមកដល់ពីមុខព្រះរាជកុមារហើយទាំងបានទទួលព្រះអំណោយសំរាប់នាងផងដែរ រួចហើយក៏ដើរចេញទៅតែរំពេកភ្លាមនោះ ស្រាប់តែមានកុមារីស្រីក្រមុំដ៏ល្អសោភាម្នាក់ទៀតចូលមក យ៉ាងប្រញាប់ប្រញាល់ ព្រោះតែនាងមកដល់ក្រោយគេ ។ **តទៅលេខក្រោយ**

43- For they felt that, Prince Siddhartha was unlike other youngmen, he had not paid attention to their beauty at all. indeed, the prince had handed a present to each of the girls, but his mind, all the time, appeared to be centered on some other thing, which was much more important that the smiling appearances and beautiful and voluptuous bodily movements of the girls. And that was why some of girls said that when the prince had handed them presents, they felt that he was not an ordinary human being at all, but, on the contrary, that he was a celestial being.



44- The line of girls had almost come to end, and the presents were all given away. The prince still sat calmly, thinking about other things. Everyone thought that the last contestant had come before the prince and received her present, but suddenly a beautiful girl hastily entered, for she had arrived late.

( Continued Issue After )

ភោជនីយដ្ឋាន ណាម វ៉ាង (ភ្នំពេញ)

Nam Vang Restaurant

571 Unit # 1 Adams Avenue. Philadelphia, Pa 19120
(inside Hong Kong Market) (215) 742-9488
Open 7 days a week from 9 a.m. – 9 p.m.

បើក 7 ថ្ងៃក្នុងមួយអាទិត្យពីម៉ោង 9 ព្រឹក ដល់ 9 យប់

១_មុខជំនាញខាងម្ហូបខ្មែរយ៉ាង ចំណាន ដូចជា:
☞ គុយទាវភ្នំពេញ
☞ គុយទាវ ឬមី-ខគោ
☞ មីកន្ធាំង ឆារសាច់គោ
☞ មីកន្ធាំងឆារគ្រឿងសមុទ្រ
☞ បាយឆារគ្រប់មុខ
☞ សាច់គោអាំង ចង្កាក់ ជាមួយ ជ្រក់ល្ហុង



២_មុខជំនាញម្ហូបវៀតណាម ឈ្ងុយឆ្ងាញ់ ដូចជា:
☞ នំបញ្ចុកទឹកត្រីពិសេស
☞ នំប៉័ងបាតេ ឬសាច់គោអាំង
☞ ខគោ នំប៉័ង ឬមី និងគុយទាវ
☞ បាយសរសាច់ជ្រូកអាំង ឬសាច់មាន់អាំង

រៀងរាល់ថ្ងៃលោកអ្នកអាចពិសាទឹកក្រឡុកគ្រប់រស់ជាតិផ្លែឈើ ដូចជា : ទុរេន ឬ អាវ៉ូកាដូ ហើយជាពិសេស មានទឹកអំពៅកិនស្រស់ៗ

(តមកពីទំព័រទី ០១)

# សួស្តីឆ្នាំ ២០១០....

តែវាជាការពិតដែលប្រទេសសេរីមានទម្លាប់រាប់អានការពិតនោះណាស់ ។ នៅពេលជាមួយគ្នា សហរដ្ឋអាមេរិក មានការត្រៀមប្តូរទម្លាប់ ដោយពង្រឹងវិន័យរដ្ឋ ដើម្បីសន្សំសំចៃ - ប្តូរពីចំណាយទៅលើឋាមពល ថ្លៃ ទៅប្រើឋាមពលធម្មជាតិតម្លៃថោក - ប្តូរពីការងារសម្រាប់ស្រុកសន្តិភាពថា "នឹងដកទ័ពពីអាហ្វ្កានីស្ថាន ដើម្បីទប់សេដ្ឋកិច្ច" បានប្តូរសន្តិភាពនៃសេដ្ឋកិច្ចនៃប្រទេសសន្តិភាពទៅជាសេដ្ឋកិច្ចនៃសង្គ្រាម ដោយបង្កើនចំនួនរោងចក្រ និងការងារ និងកងទ័ពសម្រាប់ផ្គត់ផ្គង់សង្គ្រាមមួយចំនួនធំរួចស្រេចទៅហើយ ។

រីឯសហគមន៍ខ្មែរវិញ នៅឈរមើលនៅឡើយថា តើសហរដ្ឋអាមេរិក ដើរសំដៅទៅណា? រលំនៅពេលណា ? ការងារក្រខ្សត់ ហើយត្រូវធ្វើអ្វីទៀត ? តែខ្ញុំទទួលព័ត៌មានមិនសមរម្យមកថា ល្បែងស៊ីសង នៅតែប្រព្រឹត្តច្រើនកន្លែង គ្រឿងស្រវឹង នៅតែជាឱសថសំរាប់កែការអផ្សុកដ៏សម្បូរ - រីឯអ្នករកស៊ីនៅផ្លូវលេខ ៧ ជាទូទៅឈរសម្លឹងភ្ញៀវ ដែលច្រើនតែដើរហួសហាងខ្លួន ឬក៏ជំពាក់សិន.... មនុស្សជាច្រើនបានវិនិយោគ នាឱកាសដ៏លំបាកនេះ ដោយវិធីរង់ចាំ... ខ្លះដោយវិធីដើរថយក្រោយ ។ តែមានមនុស្សខ្លះដែលភាគច្រើនជាស្ត្រី នៅពេលដែលឥតការងារធ្វើ ស្វែងមករកមើលទុកដាក់ផ្ទះសម្បែង ទុកដាក់កូនចៅឱ្យអាចទៅរៀនបានគ្រាន់ជាងមុន ឬខ្លះសួរនាំរកថ្នាក់រៀនភាសាអង់គ្លេសសម្រាប់មនុស្សចាស់ ព្រោះ ៣០ ឆ្នាំកន្លងមកខ្លួននៅតែពុំអាចទៅពេទ្យ ទៅតុលាការ ឬទៅយកសញ្ជាតិ ដោយខ្លួនឯងបាននៅឡើយ ។

នេះក៏ពុំមែនខ្ញុំនិយាយអាក្រក់ពីសហគមន៍ខ្មែរដែរ តែវាជាការពិតដដែល ។ លោក រឿម ឡុង បានវិភាគលើការវិវឌ្ឍន៍របស់សង្គមខ្មែរ នៅហ្វីឡាដែលហ្វៀនេះថា " នៅឆ្នាំដែលកន្លងទៅនេះ មានសញ្ញានៃភាពជឿនលឿនជាច្រើន នៅក្នុងសហគមន៍ ស្ថាប័នធំៗរបស់សហគមន៍ ចេះធ្វើការចូលគ្នា ដើម្បីបំរើខ្មែរមនុស្សកាន់តែច្រើន ចេញមុខមកចូលរួមការងារសង្គម ការងារសុខភាព ការងារជំនួយស្មារតីគ្រួសារ" លោកបន្តថា "សម្រេចគោលបំណងអភិវឌ្ឍន៍សហគមន៍ តម្រូវឱ្យមនុស្សធ្វើការក្នុងរូបភាព ការងាររួមកម្លាំងគ្នា : ១- មនុស្សក្នុងសហគមន៍ចូលរួមក្នុងវត្ថុបំណង និងសេចក្តីសម្រេចចិត្តច្បាស់លាស់ និងមោះមុត, ២- ដឹកនាំដោយមគ្គុទេសន៍ ដែលមានទេពកោសល្យទំនាក់ទំនង និងគ្រប់គ្រងក្រៅប្រយោជន៍ផ្ទាល់ខ្លួន, ៣- មានគម្រោងអភិវឌ្ឍន៍ ដែលមានលក្ខណៈជាបំណងកសាង, សិក្សា, បង្រៀន និងដឹកនាំគ្នាបាន ។ កត្តាបីនេះ លោក រឿម ឡុង បានសម្លឹងឃើញថា "កើតមានឡើងនៅសហគមខ្មែរ គណបក្សនយោបាយសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី ហើយជាពិសេស នៅ ខ្មែរប៉ុស្តិ៍ " ដែលកំពុងដឹកនាំសហគមន៍ឱ្យទៅរកផ្លូវអភិវឌ្ឍន៍ស្មារតីយ៉ាងគ្រប់គ្រាន់ ។

សំនួរដែលគួរតាំងចំពោះខ្លួនឯង នាចុងបញ្ចប់ឆ្នាំ ២០០៩ នេះ មានអ្វីខ្លះ ? ខ្ញុំចង់បន្ថែមលើអត្ថបទលោក ម៉ម យីន កាលពីលេខមុនថា "តើយើងមានសហការណ៍ជាមួយអ្នកភូមិផងរបងជាមួយ ដោយភាតរភាពបានខ្លះហើយឬនៅ ? តើយើងមាន "បានទៅចូលរួមប្រជុំស្វែងយល់ពីអ្នកដទៃ បានយ៉ាងតិចបានម្តងដែរឬទេ នាឆ្នាំនេះ ? តើឆ្នាំកន្លងទៅ ខ្ញុំបានធ្វើអ្វីឱ្យគ្រួសារខ្ញុំ ក្នុងគំនិតថ្មីបានម្តងដែរឬទេ ? ខ្ញុំមានរាប់ទេថា មានអ្វីខ្លះបានកើតថ្មីក្នុងសហគមន៍យើង ?" ខ្ញុំនៅចាំថា កាលពីឆ្នាំចាស់ ញូយ ចំរើន មុននឹងចេញទៅរស់នៅ ឡាស់វេហ្គាស បានប្រើពាក្យថ្មីមួយប្រយោគ គឺសូមឱ្យខ្មែរស្លាប់ឆ្លាត" (Died Smart) ពាក្យនេះ មានន័យពិតប្រាកដសម្រាប់អភិវឌ្ឍន៍ ដែលសន្និសីទរបស់លោក ធ្វើឱ្យខ្ញុំចង់ចាំរហូតដល់ថ្ងៃនេះ ។ ទស្សនៈអាមេរិកាំង គឺការងាររួមសម្បាច់គ្នា ក្នុងភាពស្មោះ និងភាពពិត បើសហគមន៍ខ្មែរ អាចបន្តការងាររួមសម្បាច់ដូចគ្នានេះតទៅមុខបានការរីកចំរើន និងកើតឡើងដូចគ្នាជាប្រាកដ ៕

(តមកពីទំព័រទី ០៧)

# លោក ជីមី ខាធ័រ...

អំណោយផ្ទះពីលោកប្រធានាធិបតីនោះ បានសម្តែងនូវការសប្បាយរីករាយយ៉ាងខ្លាំង ពីព្រោះតាំងពីគេកើតមកមិនដែលមានផ្ទះរស់នៅសមរម្យទេ គឺពេលខ្លះដេកលើគំនរសំរាមជាមួយនឹងប្រពន្ធកូន ដើម្បីរង់ចាំរើសអេតចាយ ។ លោក យិន ផេង មានអារម្មណ៍មិនខុសប្លែកពីអ្នកស្រុកដែលទទួលបានផ្ទះទាំងអស់នោះទេ គឺសុទ្ធតែបានបង្ហាញពីអារម្មណ៍រីករាយ និងដឹងគុណយ៉ាងជ្រាលជ្រៅចំពោះលោក ជីមី ខាធី យ៉ាងជ្រាលជ្រៅមិនអាចបំភ្លេចបានឡើយ ។


លោក ខាធី និងភរិយា


លោក ខាធី នៅតំបន់អាហ្វ្រិក

ដំណើរទស្សនកិច្ចផ្នែកមនុស្សធម៌របស់ លោក ជីមី ខាធី នឹងជួយជំរុញការងារមនុស្សធម៌ជុំវិញពិភពលោកឱ្យមកកាន់កម្ពុជាកាន់តែច្រើនដើម្បីជួយដល់ជនក្រីក្រទាំងនោះ ឱ្យមានក្តីសង្ឃឹមឡើងវិញ ។ ជាពិសេសធ្វើឱ្យទំនាក់ទំនងការទូតនៃប្រទេសទាំងពីរកាន់តែប្រសើរឡើងថែមទៀតផង ៕


ក្រុមអ្នកស្ម័គ្រចិត្តសង់ផ្ទះជូនជនក្រីក្រ


ចង់ចេញពីភាពទ្រុឌទ្រោម?
RELIV អាចប្តូររូបរាងកាយឱ្យមាំទាំបាន



ពិសារ Reliv រាល់ថ្ងៃ គឺនាំឱ្យមានកម្លាំងកាយ រូបរាងមាំមួន

Reliv អាចទប់ស្កាត់នូវជំងឺមួយចំនួនធំ ដែលកើតមកពីការពិសារចំណីអាហារខ្វះជីវជាតិធ្វើឱ្យសរីរាង្គតាំងដំណើរ

ពិសារ Reliv លោក-អ្នកនឹងដឹង ពីប្រសិទ្ធភាព ចាប់តាំងពីថ្ងៃដំបូង ដែលលោក-អ្នកប្រើ Reliv នេះភ្លាម ។

សូមទូរស័ព្ទជាវនៅលេខ :នៅ Philadelphia (267) 254 8758
នៅ VIRGINIA (703) 415-6257




ពេញនិយម 1. RELIV CLASSIC មួយកំប៉ុង
2. Reliv Innergize មួយកំប៉ុង ដែលជាចំណីជីវជាតិ

លាយ RELIV 1 និង RELIV 2 ម្នាងមួយស្លាបព្រាក្នុងទឹកផ្លែឈើ ហើយពិសារម្តង ឬពីរដងក្នុងមួយថ្ងៃ ទៅតាមភាពទ្រុឌទ្រោមនៃរូបរាងកាយ "ភាពរឹងមាំកើតឡើងស្ទើរជឿមិនបាន"

Reliv restores the balance by delivering a unique blend of the vitamins, antioxdants, minerals, proteins, amino acids and phyto-nutrients the body needs to restore energy, fight off infections and feel great - everyday.

New World Travel II
New World Travel II
ញូវលវើលត្រាវែលធូ

Specialized in Selling Flight Tickets
For National and International

ជំនាញខាងលក់សំបុត្រយន្តហោះសំរាប់ក្នុងប្រទេស និងអន្តរជាតិ យើងតំណាងឱ្យក្រុមហ៊ុន ចិន កូរ៉េ កាថេ ។ល។ ធ្វើលិខិត Re-Entry Permit ប្រញាប់ជូនបានទិញសំបុត្រជិះនាវាសមុទ្រ សណ្ឋាគារ ឬជួលឡាន សំបុត្រយន្តហោះទៅច្រើនប្រទេសក្នុងតម្លៃទាបបំផុត ។

Represented Several of Company such as China, Korea, Cathay etc.,
Offer Rush Re-Entry Permit
Reserve Cruise, Hotels and Car Rentals
Best Price Air Ticket for Many Destinations

600 Washington Ave Suite #8
Philadelphia, Pa 19147
Tel: (215) 463-1257
Fax: (215) 463-2036

# ហោរាសាស្រ្តប្រ ថ្ងៃទី ១១ - ២៣ ខែធ្នូ

### ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមការប៉ងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬចេញទៅជួញដូរផ្លូវឆ្ងាយគឺសមប្រកបទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបដោយសេចក្តីសុខក្សេមក្សាន្ត ៕

### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ អ្វីដែលលោក-អ្នកត្រូវយកចិត្តទុកដាក់នោះ ចូរប្រយ័ត្នប្រយែងក្រែងមានបងប្អូនញាតិមិត្តនាំរឿងក្តៅក្រហាយមកឱ្យអាចនាំឱ្យមាន អំពល់ទុក្ខដាក់ខ្លួន ព្រមទាំងអាចបង់ខាតទ្រព្យច្រើនទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ៕

### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីនៅជួបនឹងឧបសគ្គខ្លះៗក្តី ក៏មិនភ័យព្រួយអ្វីដែរ លោកអ្នកអាចទម្លុះទម្លាយបានដោយជោគជ័យ និងអាចបោះជំហានទៅមុខដោយសន្សឹមៗទៀតផង ។ ចំពោះគូស្នេហ៍ក្នុង រយៈពេលនេះ គឺអាចគិតគូរឿងអាពាហ៍ពិពាហ៍បាន ៕

### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសក្នុងការទូទាត់បញ្ជីប្រាក់កាសផ្សេងៗព្រោះកាលបើមានការភ្លាំងភ្លាត់តែបន្តិចអាចខាតបង់ទ្រព្យច្រើន ដែលមិនអាចគណនាបានឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ប្រយ័ត្នមានគេអុជអាលឱ្យបែកបាក់គ្នា ៕

### ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងផែនការជាមុន ទើបពុំមានការថ្លោះធ្លោយ ។ ក្រៅពីនោះបើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរងាប់ចិត្តឱ្យបានត្រជាក់ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕

### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះលោកអ្នកមានអារម្មណ៍ភ្លឺថ្លា គំនិតប្រាជ្ញាឈ្លាសវៃ ទោះបានប្រកបការងារអ្វីក៏អាចទទួលបានផលសម្រេចតាមការប៉ងប្រាថ្នាទាំងអស់ ។ តែចូរកុំមានចិត្តលោភលន់ឱ្យហួសប្រមាណពេកប្រយ័ត្នបង់ខាតលាភសក្ការៈទៅវិញ ។ ចំពោះគូស្នេហ៍មានភាពល្អូកល្អិនល្អណាស់ ។

### ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងជើងខ្លាំងយ៉ាងណាក្តី ក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកយកប្រៀបឈ្នះជាប់ជានិច្ច ។ ចំពោះកម្លោះក្រមុំ ក្នុងរយៈពេលនេះអាចទាក់ទងគ្នា និងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ។

### ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនិងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នករត់ចុះរត់ឡើងមានការមមាញឹក និងហត់នឿយច្រើនក្តី តែភោគផលកម្រៃហូរចូលបានតិចតួចស្តួចស្តើងប៉ុណ្ណោះ ។ ដូច្នេះចូរកុំរកបានមកដោយតឹងតែចាយធូរឱ្យសោះ ។ ចំពោះស្នេហាក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទីពា ចូលជ្រៀតជ្រែក ៕

### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ពិតមែនតែលោកអ្នកបានជួបនិងឱកាសល្អខ្លះៗក្តី តែទោះជាបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសមុននិងចុះហត្ថលេខា ឬផ្តិតស្នាមមេដៃលើលិខិតស្នាមផ្សេងៗ ចូរចេះពិនិត្យពិច្ច័យឱ្យបានល្អិតល្អន់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះចេះយល់អធ្យាស្រ័យគ្នាធម្មតា ៕

### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ដោយទំនាយទាយថាអាចបង់ខាតទ្រព្យខ្លះៗនោះ ដូច្នេះចូរកុំឱ្យគេខ្ចីរបស់របរមានតម្លៃឡើយ ព្រោះកាល បើបានធ្លាក់ដល់ដៃគេហើយ គឺគ្មានថ្ងៃបានវិលត្រលប់វិញឡើយ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានផលប៉ះទង្គិចគ្នាខ្លះ ។

### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកជាមនុស្សពូកែខាងសម្តីវោហារ ហើយបើបានធ្វើជាមេគេ និងទោះជាបាននិយាយស្តីច្រើនបន្តិចក្តី ក៏មិនឥតប្រយោជន៍ដែរ ព្រោះត្រូវបានកូនចៅនៅក្រោមស្តាប់បង្គាប់បញ្ជាឥតហ៊ានងាករេទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបដោយភាពផ្អែមល្ហែមដូចទឹកឃ្មុំ ៕

### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរ ជួបនិងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរមានស្មារតីប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអាជីវករអ្នករកស៊ីជួញដូរគឺមុននិងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើ ចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវចុះសម្រុងគ្នាទេ ៕

---

# ថែរក្សាផ្ទៃមុខដោយ ទឹកប៉ិគក់

រដូវក្តៅច្រើនធ្វើឲ្យស្បែកមុខយើងគគ្រាត ហើយជួនកាលមានដុសមុនតូចៗផង ជាពិសេស ចំពោះអ្នកនាងណាដែលច្រើនប្រើម្សៅ ។

បើចង់ឲ្យស្បែកមុខបានម៉ត់ខៃល្អ ហើយប្រសើរជានិច្ចនោះ ពេលយប់មុននឹងសម្រាន្ត ត្រូវយកសំឡីជ្រលក់ទឹកប៉ិគក់ លាបឲ្យស្មើឡើងលើមុខ តែមុននឹងលាបត្រូវលាងមុខឲ្យស្អាតសិន ។

របៀបយកទឹក គឺកិនប៉ិគក់ឲ្យម៉ត់ រួចយក ក្រណាត់យ៉ាងស្អាតទៅខ្ចប់ ហើយរិតប្រចាប់ឲ្យចេញទឹកមក ៕

---

វាពុំមែនជាកិច្ចការមួយដែលលំបាកហួសពីសមត្ថភាពដែលអាចធ្វើឲ្យបាននោះទេ ។ ប្រសិនបើសុភាពស្ត្រីទាំងឡាយត្រូវការឲ្យសរសៃសក់ទទួលបានភាពកក់ក្តៅហើយមានសោភ័ណភាពលើបរលោងស្រស់ស្អាតនោះ សូមសាកល្បងតាមវិធីខាងក្រោមនេះ ធានាថា នឹងទទួលបានផលពេញចិត្តជាក់ជាមិនខាន ÷

# អាថ៌កំបាំង សំរាប់បង្កើតភាព រលើបរលោងដល់ សរសៃសក់

១- ផ្តើមដំបូងដោយទឹកត្រជាក់កក់សក់ ។

២- ផ្លុំហួតសរសៃសក់ដោយរយៈពេលខ្លី ដើម្បីជួយដោះស្រាយសភាពសក់ស្ងួតរឹងក្រញ៉េះបានយ៉ាងល្អបំផុត ។

៣- ប្រសិនបើពេលណាមួយអ្នកប្រើប្រាស់ ផលិតផលសក់ច្រើនជ្រុល គួរប្រើសាប៊ូមកឈ្លី លើសរសៃសក់ខណៈពេលកំពុងនៅស្ងួត បន្ទាប់មកសឹមកក់លាងសក់តាមធម្មតា ។

ប្រសិនបើអ្នកព្យាយាមធ្វើតាមវិធីខាងលើនេះ នោះសរសៃសក់អ្នក នឹងមានសភាពខ្មៅរលើបរលោងតាមបំណងប្រាថ្នាមិនខាន ៕

---

(តមកពីទំព័រទី ០៨)

## នាយករដ្ឋមន្ត្រី: សវនាការ...

យើងមិនស្វែងរកអនុសាសន៍ពីលោកនាយករដ្ឋមន្ត្រី ឬនរណាម្នាក់ផ្សេងទៀតទេ" ។

លោកបានថ្លែងបន្ថែមថា សាលាក្តីមិនទាន់បានទទួលឆ្លើយតបណាមួយចំពោះដីកាកោះក្រុមមន្ត្រីគណបក្សប្រជាជនកម្ពុជា ឱ្យចូលខ្លួនកាលពីពេលថ្មីៗនេះទេ ហើយថាសំណើរទាំងឡាយរបស់សហព្រះរាជអាជ្ញាឱ្យមានការស៊ើបអង្កេតបន្ថែមលើជនសង្ស័យនៅរបបខ្មែរក្រហមនោះ គឺនៅរង់ចាំការសម្រេចជាមួយក្រុមសហចៅក្រមស៊ើបអង្កេតនៅឡើយ ។

សាលាក្តីខ្មែរក្រហមនេះ គឺជាចំណុចនៃកិច្ចពិភាក្សាជាញឹកញាប់នៅក្រុងហ្សឺណែវ ក្នុងសប្តាហ៍នេះ ក្នុងអំឡុងវត្តមាន ដែលតម្រូវឱ្យមានរបស់កម្ពុជា នៅចំពោះមុនក្រុមប្រឹក្សាសិទ្ធិមនុស្សរបស់អង្គការសហប្រជាជាតិ សម្រាប់ការពិនិត្យជាទៀងទាត់ ជាសកលលើកដំបូងរបស់ខ្លួន ។

បណ្តាប្រទេសមួយចំនួន បានលើកពីការចោទប្រកាន់អំពីអំពើពុករលួយ និងការជ្រៀតជ្រែកផ្នែកនយោបាយនៅក្នុងសាលាក្តីនេះ។

លោក រ៉ូបឺត ជេនសៀបេន មកពីប្រទេស ហូឡង់ បានលើកពី "ការចោទប្រកាន់ជាហូរហែអំពីអំពើពុករលួយ និងការជ្រៀតជ្រែកផ្នែកនយោបាយនៅអង្គជំនុំជម្រះវិសាមញ្ញក្នុងតុលាការកម្ពុជា" ។ ហើយបានស្នើឱ្យកម្ពុជា អនុញ្ញាតឱ្យមានដំណើរទស្សនកិច្ចរបស់អ្នករាយការណ៍ពិសេសនៃអង្គការសហប្រជាជាតិ ស្តីអំពីឯករាជ្យភាពរបស់ចៅក្រម និងមេធាវី។

ក្រុមអ្នកតំណាងរបស់កម្ពុជានៅឯការពិនិត្យ ក្នុងទីក្រុងហ្សឺណែវ នោះ មិនបានលើកឱ្យចំអំពីការសង្ស័យចំពោះអំពើពុករលួយ និងជ្រៀតជ្រែកនៅក្នុងអំឡុងការពិនិត្យ កាលពីថ្ងៃអង្គារ នោះទេ ។ ផ្ទុយមកវិញ លោក ស៊ុន សួន អ្នកតំណាងអចិន្ត្រៃយ៍របស់កម្ពុជាប្រចាំអង្គការសហប្រជាជាតិ បានពណ៌នាសាលាក្តីខ្មែរក្រហមនេះថា ជាគំរូនៅយុត្តធម៌បែបទំនើបសម្រាប់កម្ពុជា ។

លោក ស៊ុន សួន បានថ្លែងប្រាប់ការពិនិត្យ នោះថា "គេសង្ឃឹមថា អង្គជំនុំជម្រះវិសាមញ្ញ ក្នុងតុលាការកម្ពុជា បានក្លាយជាគំរូមួយ... ក្នុងការពង្រឹងច្បាប់នៅក្នុងប្រទេសកម្ពុជា" ៕

---

(តមកពីទំព័រទី ០៨)

## គឺអាចមានរបបខ្មៅងងឹត...

លោក គាត ឈន់ រដ្ឋមន្ត្រីក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុ លោក ស៊ឹម ការ និងលោក អ៊ុក ប៊ុនឈឿន សមាជិកព្រឹទ្ធសភា ដើម្បីចូលខ្លួនបំភ្លឺជាសាក្សីនៅចំពោះមុខតុលាការ ។ ចំណែកឯគណៈកម្មាធិការប្រព្រឹត្តិកម្មខ្មែរដើម្បីយុត្តិធម៌ និងសមធម៌ដែលដឹកនាំ ដោយលោក សួន សេរីរដ្ឋា ក៏បានស្នើសុំឱ្យកោះហៅអតីតស្តេចផែនដីខ្មែរសម្តេច នរោត្តម សីហនុ និងលោក ហ៊ុន សែន ផងដែរមកសួរចម្លើយ ទោះក្នុងឋានៈជាសាក្សីក្តី ជាជនសង្ស័យក្តី ឬជាជនរងគ្រោះក៏ដោយ ។ រីឯខ្មែរនៅក្រៅប្រទេសក៏បាននាំគ្នាដាក់ពាក្យប្តឹងដើម្បីកាត់ទោសពួកមេខ្មែរក្រហមក្នុងការស្វែងរកយុត្តិធម៌ជូនជនរងគ្រោះ និងចង់ឃើញសាលាក្តីមួយនេះ ដំណើរការជោគជ័យដល់ទីបញ្ចប់ ៕

(តមកពីទំព័រទី ០១) **ខ្មែរនៅ ស.រ.អា ធ្វើបាតុកម្មប្រឆាំង...**



សេរីភាពជនជាតិខ្មែរ" "ហ៊ុន សែន ជាជនទុច្ចរិតពុករលួយ" "ហ៊ុន សែន ជាជនលក់ក្បាលឱ្យយួន" "ហ៊ុន សែន ត្រូវឈប់ប្រព្រឹត្តអំពើអយុត្តិធម៌" "សូមរដ្ឋាភិបាលសហរដ្ឋអាមេរិកទប់ស្កាត់ ហ៊ុន សែន ហើយជួយការពារជនជាតិខ្មែរ ដែលមានឧត្តមគតិជាអ្នកស្រឡាញ់ជាតិ មាតុភូមិពិតប្រាកដផង" ។

ក្នុងរយៈពេលប្រមាណបួនម៉ោង ក្រុមបាតុករបានសម្តែងទឹកចិត្តឈឺចាប់យ៉ាងខ្លាំង ចំពោះទង្វើ និងការប្រព្រឹត្តរបស់នាយករដ្ឋមន្ត្រី ហ៊ុន សែន តាំងតែពីពេលកងទ័ពយួនក្រហម បានតែងតាំងឡើង កាលពីថ្ងៃទី ៧ ខែមករា ឆ្នាំ ១៩៧៩ ឱ្យធ្វើជាមេដឹកនាំអាយ៉ង រួមគ្នាជាមួយ ជា ស៊ីម ហេង សំរិន សុខ អាន ជាដើមផងដែរ ។






បាតុករ និយាយថា "ក្រុមអាយ៉ងយួននេះ បានបំពេញមុខនាទីជាជនបំរើដាច់ថ្លៃរបស់ប្រទេសយួនវៀតណាមក្រហម ដោយគ្មានគិតដល់ការរលំរលាយបាត់បង់ទៅនូវមាតុភូមិ និងពូជសាសន៍ខ្មែរឡើយ" ។

ក្រុមបាតុករអហឹង្សា បានស្រែកស្នើសុំទៅលោកឯកអគ្គរដ្ឋទូតខ្មែរ ប្រចាំសហរដ្ឋអាមេរិកឱ្យចេញ មកជួបប្រាស្រ័យជាមួយក្រុមបាតុករ និងដើម្បីប្រគល់ជូននូវញត្តិមួយច្បាប់ឱ្យពាំនាំយកទៅឱ្យនាយករដ្ឋមន្ត្រីខ្មែរ នៅក្រុងភ្នំពេញ ។ ទោះបី ក្រុមបាតុករ បានស្រែកស្នើសុំយ៉ាងទទូច ក៏លោកទូតខ្មែរ ពុំចេញមកប្រាស្រ័យគ្នា និងទទួលយកញត្តិនោះឡើយ ។

លោកទូតខ្មែរ បានធ្វើគរ ធ្វើថ្លង់ មិនដូចអង្គទូតប្រចាំនៅប្រទេសមហាអំណាចសហរដ្ឋ-អាមេរិកនេះទេ ។

ក្រុមបាតុករអហឹង្សាទាំងអស់ នៅពេលមុននឹងបែកគ្នា បានប្តេជ្ញាតាំងចិត្តជាដាច់ខាត នឹងនៅតែបន្តការទាមទារ តវ៉ាទៅដល់នាយករដ្ឋមន្ត្រី ហ៊ុន សែន ទៅតាមមធ្យោបាយ និងវិធីផ្សេងៗទៀត ក្នុងការប្រឆាំងតវ៉ា តស៊ូមតិជាមួយមេដឹកនាំខ្មែរ ជាពិសេសឱ្យ ហ៊ុន សែន ទទួលខុសត្រូវចំពោះការបោះបង្គោលព្រំដែនជាមួយប្រទេសយួន ដែលបណ្តាលឱ្យយួនចំណេញក្នុងការពង្រីកទឹកដីបាន ។

បាតុកម្មអហឹង្សា នៃប្រជាជាតិខ្មែរ រស់នៅសហរដ្ឋអាមេរិក ឆ្នេរសមុទ្រខាងកើត បានរំសាយនៅវេលាម៉ោង ២:០០ រសៀល ហើយបានលាគ្នាទៅកាន់រដ្ឋផ្សេងៗរៀងខ្លួនវិញ ក្នុងក្តីស្និទស្នាល និងសាមគ្គីភាព ទឹកមុខរីករាយដោយបានបំពេញកាតព្វកិច្ចដ៏សំខាន់មួយ ក្នុងបុព្វហេតុជួយសង្គ្រោះ មាតុភូមិឱ្យបានគង់វង្សស្ថិតស្ថេរនៅរៀងរហូតតទៅ ៕


## សូមជួយទិញសៀវភៅខ្មែរ

**អង្គការជានរណា ?**

ជាសៀវភៅកំណត់ត្រានូវរឿងពិត ដែលបានកើតឡើងនៅក្នុងប្រទេសកម្ពុជា ជំនាន់ខ្មែរក្រហមកាន់អំណាច ហើយអ្នកនិពន្ធរែកមុខអ្នកណាដែលជាឃាតករ ដែលគេឱ្យឈ្មោះថា អង្គការនោះ ។ សៀវភៅរួមមានពាក្យាល :

**ភ្នំពេញមុនឆ្នាំ ១៩៥៥**

អ្នកនិពន្ធ កែវ ប៊ុនធឿន បានកត់ត្រាការផ្លាស់ប្តូរមុខមាត់ទីក្រុងភ្នំពេញ ពីជំនាន់មួយទៅជំនាន់មួយ និងហេតុការណ៍ដែលបានកើតឡើងក្នុងជំនាន់នោះ ។

**វាសនាខេមរៈបុត្រ :**

លោក បណ្ឌិត ឌុក រ៉ាសុី ធ្វើអត្ថាធិប្បាយពីសិទ្ធិមនុស្ស ប្រវត្តិនៃសិទ្ធិមនុស្ស រហូតដល់យកសិទ្ធិមនុស្សធ្វើជាមូលដ្ឋាន ដើម្បីរៀបចំសង្គមរៀបចំច្បាប់រដ្ឋ ធ្វើឱ្យប្រទេសជាតិមានភាពសុខដុមរម្មនា ។

បើលោកអ្នកចង់លក់ ចង់ទិញ ឬចង់ផ្សព្វផ្សាយអ្វីផ្សេងៗ សូមអញ្ជើញផ្សព្វផ្សាយក្នុងទំព័រសារព័ត៌មានខ្មែរប៉ុស្តិ៍ ដែលអ្នកអានជាទូទៅចូលចិត្ត លោកអ្នកនឹងបានជួបភ្ញៀវរបស់លោកអ្នកយ៉ាងឆាប់រហ័ស ។

សូមទូរស័ព្ទមក **សុបិន (267) 253-3947**

| មានលក់នៅស្រុកអាមេរិក | ស្រុកបារាំង |
|---|---|
| -សាភ៌ម៉ានី (ខ្មែរ).....10$ | .......10€ |
| -រចាំក្បាច់បុរាណ ភ្លេង ឈ្មោន (បារាំង).....10$ | .......10€ |
| -រឿងរាមកេរ្តិ៍ (ខ្មែរ-បារាំង).....10$ | .......10€ |
| -រាមកេរ្តិ៍តាមផែវិហារព្រះកែវមរកត (ខ្មែរ-បារាំង)...10$ | .......10€ |
| 1-CAMBODGE (Français).....10$ | .......10€ |
| 2-CAMBODGE (Français).....10$ | .......10€ |

**USA**
The Khmer post
Call Sabane : (267) 253-3947

**FRANCE**
Cambodiana Vidéo
22.rue du Disque 75013 Paris
Tél : 01 45 84 07 57

**ប័ណ្ណបញ្ជាកាសែតខ្មែរប៉ុស្តិ៍**
ឈ្មោះ និងអាស័យដ្ឋានរបស់ខ្ញុំ

ឈ្មោះ :..........

អាស័យដ្ឋាន..........

**ខ្ញុំចង់បាន :**

☐ កាសែតខ្មែរប៉ុស្តិ៍ ១ខែ មាន២លេខ ៦ខែ $30 ១២ខែ $60
☐ សៀវភៅឈ្មោះ..........តម្លៃ $..........
☐ ស៊ីឌីប្រវត្តិសាស្ត្រខ្មែរ ៤ ម៉ោង តម្លៃមួយសិត $30
ខ្ញុំភ្ជាប់សែក ឬ មនីអដ័រ មក U.A.M.G តម្លៃ $..........
ផ្ញើមក U.A.M.G 438 LINDLEY AVE .PHILADELPHIA PA 19120
Phone : KIM PHIEN 215-680-2059 or Saben 267 253 3974

**ប្រវត្តិសាស្ត្រនៃកម្ពុជា**
លោក វ៉ាន់ឌីកាអុន ទើបនឹងសរសេរសៀវភៅប្រវត្តិសាស្ត្រនេះ ពីសម័យអាណានិគមបារាំងមកដល់បច្ចុប្បន្នកាល ។ ភាគទី១/ភាគទី២ ចេញផ្សាយរួចហើយ នៅប្រទេសបារាំង ។
Email. VANDY_KAONN@YAHOO.COM

**ប្រវត្តិសាស្ត្រខ្មែរបច្ចុប្បន្ន**
ថាស ស៊ីឌី ដែលរៀបរៀងដោយ ពិន សំខុន ហើយផ្សព្វផ្សាយនៅវិទ្យុសម្លេងខ្មែរ-អាមេរិកាំង ។ ថាស ស៊ីឌី ចំនួនបួនម៉ោងស្តីពីប្រវត្តិកម្ពុជា ចាប់តាំងពីសម្តេចនរោត្តម សីហនុ បានធ្លាក់ពីអំណាចនាឆ្នាំ ១៩៧៥ មកដល់ឆ្នាំ ២០០៤ ។
ទូរស័ព្ទ 215-680-2059

ខ្មែរប៉ុស្តិ៍ រកអ្នកតំណាងពាណិជ្ជកម្មនៅ ឡូវែល រដ្ឋម៉ាសាឈូសែត ទទួលបានកំរៃខ្ពស់ ។
សូមទំនាក់ទំនងមក **សុបិន** តាមរយៈលេខទូរស័ព្ទ: (267) 253-3947 ។ សូមអរគុណ !

**Your Advertisement Is Here For Less than $10 for two weeks!**

**ដំណឹងពីការលក់ និងទិញផ្ទះក្នុងតំលៃសមរម្យ**
នាងខ្ញុំឈ្មោះ **សារឿន** ធ្វើការនៅការិយាល័យ Advance Realty One, LLC. " The Full Service Discount Expert," ទិញ និងលក់ផ្ទះ ។
បើអស់លោកអ្នកចង់លក់ និងទិញផ្ទះ សូមទំនាក់ទំនងមកនាងខ្ញុំតាមលេខ : (215) 833-6673 ។ សូមអរគុណ !

(តមកពីទំព័រទី ០១)

## រង្វាន់ឆ្នាំថ្មី ដោយក្រុមសិល្បៈស្ហេន...

យើងចង់នាំមកជូននូវសម្បត្តិវប្បធម៌ ដែលមានតម្លៃគ្រប់ពេលវេលា និងកាត់ថ្លៃមិនបាន" ។ ឆ្នាំមុនក្រុមសិល្បករទាំងអស់ បានសម្តែង ៣២០



កន្លែង នៅទីក្រុងចំនួន ៩០ នៅចំពោះទស្សនិកជន ដែលមានតែការកោតសរសើរចំនួន ៨០០.០០០ នាក់ រួចហើយនៅ ឆ្នាំ ២០១០ នេះទៀត CINDAY WANG អ្នកនាំពី មជ្ឈមណ្ឌលវប្បធម៌អាស៊ី នៅហ្វីឡាដែលហ្វៀ បាននិយាយថា "ខ្ញុំមានការញាប់ញ័រ ដែលបាននាំទស្សនីយភាព ទំហំរបៀបនេះ មកទីក្រុងហ្វីឡាដែលហ្វៀ... ការសម្តែងនោះ សន្យាថានឹងនាំមក នូវការអប់រំក្នុងរូបភាពជាសិល្បៈ ហើយនឹងបង្ហាញដល់គ្រួសារទាំងអស់នូវរូបភាពចម្រុះពណ៌នៃមនុស្ស" ។

រៀបចំឡើងដោយអង្គការគ្មានយកចំណេញ (NONPROFIT ORGANIZATION) នៅ ញូយ៉ក គឺជាអង្គការឯករាជ្យពីរដ្ឋអំណាចនយោបាយចិន ដែលបានធ្វើឱ្យសិល្បៈខ្លួនខ្ទេចខ្ទាំ... សមាជិកខ្លះនៃ "ក្រុមសិល្បៈ "ស្ហេនយុន" គឺជាអ្នកប្រារព្ធពិធីសមាធិដ៏ល្បីល្បាញនៅសហគមន៍ចិន ឈ្មោះ ហ្វាលុង គង ៕

*ខ្មែរប៉ុស្តិ៍*


# DRANOFF ASSOCIATES
*Attorneys at Law*

"ដ្រាណុហ្វ អាសូស៊ីយេត (DRANOFF ASSOCIATE ) គឺជាមណ្ឌលការពារតាមផ្លូវច្បាប់ ដែលធ្វើការប្រកបដោយភក្តីភាព ដើម្បីតំណាងឱ្យអ្នករងគ្រោះដែលមានរបួសរាងកាយ ។

ស្ទីវិន ដ្រាណុហ្វ (STEVEN DRANOFF) គឺជាមេធាវីនៅសាលាក្តីមានបទពិសោធន៍៣៥ឆ្នាំ ធ្វើជាតំណាងឱ្យឯកជន ដែលពុំមែនឱ្យក្រុមហ៊ុន ឬក្រុមធានារ៉ាប់រងទេ ។

យើងធានាថា ផ្តល់គុណភាពសេវាច្បាប់យ៉ាងខ្ពស់ ហើយយកចិត្តទុកដាក់ ជាពិសេសដល់អតិថិជនរបស់យើង ។

យើងធ្វើការដោយយកកំរៃពីការងារដែលប្រគល់ឱ្យ - បានន័យថា លោកអ្នកមិនចាំបាច់ចេញថ្លៃចំណាយអ្វី មុននឹងលោកអ្នកទទួលប្រាក់សងពីមុខរបួសលោកអ្នកនោះទេ ។

ជំនួយខាងផ្លូវច្បាប់អាចផ្តល់ជូនជាភាសា ស្បាញ៉ុល ខ្មែរ វៀតណាម កូរ៉េ និង ចិន ។

សូមអញ្ជើញទូរស័ព្ទមកពេលនេះភ្លាមចុះ ដើម្បីពិគ្រោះសម្ងាត់ដោយមិនគិតថ្លៃ ឬក៏អញ្ជើញមកជួបនៅការិយាល័យយើងក៏បាន ។

DRANOFF ASSOCIATES

121 South Broad Street, Suit 1210, Philadelphia, PA 19107

215-732-3333 (phone) 215-732-8059 (fax)

sdranoff@dranofflaw.com



មានជំនាញខាងទិញ.លក់ផ្ទះ.ពាណិជ្ជកម្ម. វិនិយោគ ហិរញ្ញវត្ថុ ឬជួល

យើងស្វាគមន៍រាល់លោកអ្នកដែលថ្មីនិងវិនិយោគ

Vinh Ho, 215-391-9516

Email: vho.realestate@consultant.com

ANCHOR Real Estate Development

320 Oregon Ave, #3B, Philadelphia, PA 19148

Specialize - Buy_Sell_Invest_Finance_Rent ...

Beginner-investors are welcomed!



Sav-Mor PHARMACY Tel: 215-467-1220

# ឱសថស្ថានខ្មែរ

Sav-Mor PHARMACY

Sam EA R.Ph.

2232 S. 7th St. (7th & Wolf) Philadelphia, Pa 19148

Tel: 215.467.1220 Fax: 215.467.1447

## បំរើលោកអ្នកដោយមិត្តភាព និងទន់ចិត្ត

- Sav-Mor គឺជាឱសថស្ថានបំរើ ការចែកចាយថ្នាំ ហើយអាចពន្យល់ពីរបៀបប្រើប្រាស់ថ្នាំ តាមវេជ្ជបញ្ជាជាភាសាខ្មែរបាន
- យើងទទួលយកនូវ MEDICARE MEDICAID និង INSURANCES ជាច្រើនទៀតផង យើងមានលក់កាត សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ឬទៅអន្តរជាតិ

*Accept most insurance plans including Medicare & Medicaid

*Easy Prescription transfer

*Inside. Prepaid phone card. Call Cambodia.



NOEL TAX CONSUL TANTS

LICENSED & INSURED

# Financial Services

## សេវាប្រកបដោយវិជ្ជាជីវៈ :

- ខ្ចីប្រាក់ទិញផ្ទះ MORTGAGE
- អន្តោប្រវេសន៍ IMMIGRATION
- បកប្រែភាសា TRANSLATION
- ធ្វើប្រថាប់ត្រាបញ្ជាក់លិខិតផ្លូវការ -NOTARY
- មានសេវាមើលកូន នឹងថែទាំផ្ទះសម្បែង

## ណូអែល មជ្ឈមណ្ឌលសេវាធ្វើតាក់

សម្រាប់មុខរបរ ឬឯកជន-កត់ត្រាចំណូលចំណាយប្រចាំថ្ងៃនឹងប្រចាំត្រីមាស អ្នកឯកទេសចំណាន នឹងធ្វើតាក់យ៉ាងប្រសើរជូនលោកអ្នក

ការិយាល័យ : 6341RISING SUN AVE Philadelphia PA 1911

Phone (215) 821-2443

Fax (215) 821-2446

E-mail : noel.tax@gmail.com



Nationwide

# Nationwide

Insurance & Financial Service

## សេវាធានារ៉ាប់រង និងហិរញ្ញវត្ថុ

We offer Cheap Price for Every Client

## យើងធ្វើជូនគ្រប់គ្នៀវដោយតម្លៃថោក

| | |
|---|---|
| Business Liability Insurance | ធានារ៉ាប់រងជំនួញឈាកអ្នក |
| Home Insurance | ធានារ៉ាប់រងផ្ទះសម្បែង |
| Health Insurance | ធានារ៉ាប់រងសុខភាព |
| Auto Insurance | ធានារ៉ាប់រងរថយន្ត |
| Life Insurance | ធានារ៉ាប់រងជីវិត |

Discount 30% when you purchase Home & Auto Insurance

ចុះតម្លៃ ៣០ % បន្ថែមបើលោកអ្នកទិញ ធានារ៉ាប់រងផ្ទះ និងរថយន្តរួមគ្នា

South Philadelphia office:

600 Washington Ave Suite #8 Philadelphia, PA 19147

Tel: (215) 463-1257 , Fax: (215) 463-2036

# ភោជនីយដ្ឋានខ្មែរ

# Kavei
## CAMBODIAN RESTAURANT

Authentic Khmer • Thai • Lao • Vietnamese Phở

**320 W OREGON AVENUE**
**(OREGON MARKET, SOUTH PHILLY)**

**215.952.6688**

**OPEN 7 DAYS A WEEK**
**9am-10pm**











- ភោជនីយដ្ឋានយើងខ្ញុំ ចាប់ផ្តើមបើកពីថ្ងៃហើយ!
- មានម្ហូបខ្មែរពិសេសៗជាច្រើនមុខ ម្ហូបថៃ ឡាវ និង ហ្វៀតណាម
- មានទទួលសម្រាប់ពិធីជប់លាង ខួបកំណើត និង ពិធីផ្សេងៗ
- មានតន្ត្រីសម័យកំដររៀងរាល់ល្ងាច ថ្ងៃសុក្រ-សៅរ៍-អាទិត្យ
- លោកអ្នកអាចទូរស័ព្ទមកកក់តុទុកមុនបាន
- មានកន្លែងចតរថយន្ត ដ៏ធំទូលាយ

| 20% OFF DINNER (min. order $20) Cannot Combine with Other Offer Expire: 12/30/09 | 10% OFF DINNER TAKE OUT (min. order $15) Cannot Combine with Other Offer Expire: 12/30/09 |
|---|---|




